# KhmerPost USA

សុបិន : (267) 253-3947, សែម : (781) 244-0522


មាតិការឿង | ទំព័រ




VOL. 06 ISSUE 105 April.20th - May.03rd, 2012


# ស្វែងយល់អំពីពិធីចូលឆ្នាំខ្មែរ

ដោយ អ៊ឹម លឿម

• ខែចែត្រចូលឆ្នាំ តាមចំណាំយើងទៅលេងវត្ត ម៉ែអើយកុំឃាត់ កូនទៅលេងវត្តសប្បាយនឹងគេមួយឆ្នាំ មានម្តងធ្វើបុណ្យផ្សងនឹងទេវតា កើតជាតិណា១កូនប្រាថ្នាល្អជាចំគេ...។

នេះជាបទចម្រៀងរាំវង់ប្រពៃណីមួយក្នុងចំណោមចម្រៀង តទៅទំព័រទី៣







# បង្កើតក្រុងខ្មែរនៅឡូវែល



ឥពិន សំខុន សម្ភាសន៍ជាមួយលោក វ៉ាស្នា នួន

លោក វ៉ាស្នា នួន បានជាប់ឆ្នោតជាសមាជិកក្រុមប្រឹក្សាក្រុងចូលមកកាន់តំណែង កាលពីខែមករា ឆ្នាំ២០១២ នៅសាលាក្រុងឡូវែល ចំពេលដែលក្រុងនេះបានអនុញ្ញាតិឱ្យបង្កើតតំបន់មួយដែលមានពាណិជ្ជកម្មខ្មែរច្រើន ហើយដាក់ឈ្មោះថា "**ក្រុងខ្មែរ**"។ តើក្រុងខ្មែរជាអ្វី ? **តទៅទំព័រទី ៨**



# The KP Press Club

## Presents the 2nd Annual Media & Community Building Gathering

Sponsored by









## សេចក្តីអញ្ជើញ



Roger Samkhon Pin, Publisher & Editor-in-Chief

***ជូលបងប្អូនខ្មែរ មានថ្នាក់ដឹកនាំ អ្នកប្រកបរបរពាណិជ្ជកម្ម ឬអ្នកផ្តល់សេវាកម្មនានា ដែលរស់នៅម៉ាសាឈូសែត រ៉ូដអាយឡិន ញូហាមស្ហី និងកុណិចទិកិត***

សូមអញ្ជើញមកចូលរួមក្នុងកម្មវិធី "ប្រេសក្លឹបពិសេស" សំរាប់បងប្អូន ក្នុងតំបន់បញ្ចេញសម្លេងបង្កើតទំនាក់ទំនងតាម "ណេតវើក" ដ៏សំខាន់ ដែលខ្មែរប៉ុស្តិ៍ ស.រ.អា ខិតខំកសាងជូនសហគមន៍ខ្មែរ តាំងពីជាង៥ឆ្នាំមកហើយ ។

អាចនឹងជួយបង្កើនទំនាក់ទំនងពាណិជ្ជកម្ម ឬជួបអ្នកនយោបាយក្តី ក្នុងឱកាសកាសល្ងៀងសាយភោជដ៏ឈ្ងុយឆ្ងាញ់នៅភោជនីយដ្ឋានដ៏ធំល្អមួយរបស់ជនជាតិអាស៊ីលោកអ្នកនឹងចូលរួមសកម្មភាពព័ត៌មានរបៀបថ្មីមួយ ដែលជនជាតិអាស៊ីយើងពុំដែលបានធ្វើពីមុនមកនៅក្នុងតំបន់នៅ ឡើយទេ ។

សូមលោកអ្នកអញ្ជើញចូលរួមក្នុងឱកាសដ៏កម្រនៃ "ប្រេសក្លឹបនេះ" បើកជូនលោកអ្នកជាពិសេស សំរាប់តំបន់កុំបីអាក់ខានឡើយ ។

យើងបានជ្រើសយកភោជនីយដ្ឋានដ៏ធំបង្អស់មួយនៅផ្លូវជាតិខ្ទែង៩៣ និង៩៥ ហើយទទួលលោកអ្នកជាមួយម្ហូបប្រណីត៨មុខ ចំអិនដោយចុង ភៅជាតិចិនដ៏ឆ្នើម ដើម្បីបំណែតអារម្មណ៍ជាមួយគ្នាក្នុងបរិយាកាសនៃអធិរាជក្រុងចិនបូរាណផង ។ **សូមអរគុណ ពិន សំខុន**

**Date:** Friday, May 4th, 2012
**Time:** 5:30 – 9:30 p.m.
**Place:** New China Pearl Restaurant, 288 Mishawum Road. Woburn, MA.
**Cost:** $35 per attendance

Calling for all the Cambodian Community members/leaders, professionals, business owners, and service providers of Massachusetts, Rhode Island, New Hampshire and Connecticut to join our Exclusive Press Club event to meet and greet to build your network and to give voice for your community through KhmerPost USA newspaper and other local media outlets. Eight Courses of Meal will be served, Presentations. Q and A session, Open forum, and Social Networking. Please make your RSVP today!

**RSVP : 267-253-3947/KhmerPostUSA@gmail.com**

តមកទំព័រទី ១

# ស្វែងយល់អំពីពិធីចូលឆ្នាំខ្មែរ

ប្រពៃណីរបស់ខ្មែរយើងដែលមានជាច្រើនបទ ផ្សេងទៀតដែលត្រូវបានគេឮនៅតាមភូមិស្រុកនានា និងនៅតាមវត្តអារាមផ្សេងៗក្នុងឱកាសបុណ្យចូលឆ្នាំខ្មែរដែលជាពិធីបុណ្យប្រពៃណីជាតិ ។ ក្រៅពីប្រទេសកម្ពុជាបុណ្យចូលឆ្នាំក៏ត្រូវបានប្រទេសកាន់សាសនាព្រះពុទ្ធមួយចំនួននៅក្នុងតំបន់អាស៊ីអាគ្នេយ៍ ដូចជា ប្រទេសថៃ ឡាវ ភូមា នេប៉ាល់ ស្រីលង្កា ចិន (តំបន់យូណាន)... ក៏បានប្រារព្ធធ្វើបុណ្យចូលឆ្នាំបែបនេះ ដូចនៅប្រទេសកម្ពុជាផងដែរ ប៉ុន្តែមានលក្ខណៈខុសគ្នាខ្លះៗនៅត្រង់ពេលវេលានៃការប្រារព្ធ និងកិច្ចប្រារព្ធពិធីបិណ្ឌតែម្តង ព្រោះត្រិទិនព្រះពុទ្ធសាសនាត្រូវបានគេប៉ាន់ស្មានខុសៗគ្នាដោយអាស្រ័យទៅតាមតំបន់ផ្សេងៗទូរទាំងពិភពលោក ។

ប្រតិទិនព្រះពុទ្ធសាសនាជាទូទៅប្រើទៅតាមដំណើរព្រះច័ន្ទ (ច័ន្ទគតិ) ដោយដើមឆ្នាំចាប់ផ្តើមនៅរង្វង់ចុងខែធ្នូ ឬដើមខែមករានៃប្រតិទិនសុរិយគតិ ។ មួយខែៗនៃប្រតិទិនច័ន្ទគតិមាន ២៩ ថ្ងៃ ទៅ៣០ថ្ងៃយោងទៅតាមរយៈពេលវែងខ្លីនៃដំណើរព្រះច័ន្ទក្នុងខែនិមួយៗ ។

នៅពេលប្រារព្ធពិធីបុណ្យចូលឆ្នាំថ្មីម្តងៗ យើងតែងគិតពិចារណា និងកែលំអរកំហុសពីឆ្នាំចាស់ ដើម្បីមានសេរីសួស្តីនៅវេលាចូលឆ្នាំថ្មី ហើយខិតខំជម្រះចោលនូវគំនិតអាក្រក់ជាចិត្តដែលប្រកបទៅដោយអកុសលឱ្យជ្រះស្រឡះ ហើយចំរើនឡើងវិញនូវចិត្តដែលប្រកបដោយព្រហ្មវិហារធម៌ ។



នៅប្រទេសកម្ពុជាបុណ្យចូលឆ្នាំជាទំនៀមទំលាប់ដ៏ល្អផូរផង់មួយដែលដូនតាបានបន្សល់ទុកជាយូរយារណាស់មកហើយៗ ក៏ជាពិធីជាតិដ៏ធំមួយដែរ ព្រោះថា នោះជាពិធីបុណ្យដែលមានរយៈពេលបីថ្ងៃ ហើយជួនកាល៤ថ្ងៃ ឬក៏ច្រើនជាងនេះ ។ ប៉ុន្តែជាធម្មតាបុណ្យចូលឆ្នាំខ្មែរតែងតែចាប់ផ្តើមនៅថ្ងៃទី ១៣ ឬ ទី១៤ មេសាយោងទៅតាមមហាសង្ក្រានដែលជាក្បួនទស្សន៍ទាយបែបបុរាណមួយ ។





តាមពិតបុណ្យចូលឆ្នាំខ្មែរនាសម័យបុព្វកាលត្រូវបានគេប្រារព្ធធ្វើនៅថ្ងៃទី ០១ ក្នុងខែទី០១ នៃប្រតិទិនច័ន្ទគតិដែលអាចមាននៅក្នុងខែវិច្ឆិកា ឬដើមខែធ្នូ ។ នាសម័យអង្គរក្នុងសតវត្សរ៍ទី ១៣ ព្រះបាទសុរិយាវរ្ម័នទទី២ ឬព្រះបាទជ័យវរ្ម័នទី៧ ជាអ្នកដូរពេលវេលានៃការប្រារព្ធបុណ្យចូលឆ្នាំខ្មែរឱ្យទៅនៅខែទី៤ ដែលជា ខែមេសានៃប្រតិទិនសុរិយគតិវិញ។ ៩៥ភាគរយនៃប្រជាពលរដ្ឋខ្មែរទាំងអស់ជាកសិករ ។ នៅចន្លោះខែ វិច្ឆិកា និង ខែមិនា ជារដូវច្រូតកាត់ដែលប្រជាកសិករខ្មែររវល់យ៉ាងមមាញឹកក្នុងការប្រមែប្រមូលភោគផលទុកដាក់ ។ លុះបន្ទាប់ពីរដូវច្រូតកាត់ប្រជាកសិករខ្មែរអាចមានពេលទំនេរ ព្រោះថាគ្មានភ្លៀងឯអាកាសធាតុទៀតសោត ក៏ក្តៅហួតហែងផងដែរនៅក្នុងខែមេសានេះ ។ **តទៅទំព័រទី ២១**

# កិច្ចប្រជុំអាស៊ានដោះដូរគំរោងពិភាក្សា ជម្លោះដែនសមុទ្រចិនភាគខាងត្បូង

**ដោយ : សុខុម**





កិច្ចប្រជុំកំពូលអាស៊ានលើកទី២០ដឹកនាំដោយលោក ហ៊ុន សែន នាយករដ្ឋមន្ត្រីនៃព្រះរាជាណាចក្រកម្ពុជា បានធ្វើឱ្យមជ្ឈដ្ឋានអ្នកវិភាគនយោបាយជាតិ និងអន្តរជាតិមានការភ្ញាក់ផ្អើលយ៉ាងខ្លាំង និងនឹកស្មានមិនដល់មានការប្រែប្រួលនយោបាយរហូតដល់ការផ្លាស់ប្តូរគំរោងពិភាក្សា **រឿងជម្លោះដែនសមុទ្រភាគខាងត្បូង** ដោយយកជំនួយរបស់ប្រទេសចិនជាថ្នូរ ។

តាមការវិភាគនៃក្រុមអ្នកនយោបាយរបស់រដ្ឋាភិបាល និងគាំទ្ររដ្ឋាភិបាលមានលោក សុខ ទូច,រស់ ចន្ទ្រាបុត្រ,ផៃ ស៊ីផាន,បាននាំគ្នាវិភាគអះអាងទៅលើតែការផ្តល់ជំនួយរបស់ប្រទេសចិន ដែលឱ្យប្រទេសកម្ពុជាខ្ចីប្រាក់របស់រយលានដុល្លារជារឿងរបស់ពួកគេតែប៉ុណ្ណោះ។ ប៉ុន្តែពួកអ្នកវិភាគទាំងនោះមិនបានយកហេតុផលនយោបាយប្រទេសជាតិធ្វើជាការដោះដូរគំរោងជម្លោះដែនសមុទ្រចិនភាគខាងត្បូងចេញពីកិច្ចប្រជុំកំពូលអាស៊ាននៅវិមាន







សន្តិភាពរាជធានីភ្នំពេញនៃព្រះរាជាណាចក្រកម្ពុជាកន្លងទៅនោះ ។ បញ្ហាជម្លោះនៅដែនសមុទ្រចិនខាងត្បូងនោះកំពុងតែមានវិបត្តិយ៉ាងធ្ងន់ធ្ងរមកលើប្រទេសមួយចំនួនដែលជាសមាជិកអាស៊ានមានប្រទេសវៀតណាមហ្វីលីពីន ម៉ាឡេស៊ី និងប្រទេសប្រ៊ុយណេ ជាមួយ និងប្រទេសចិន ៕

KHMER POST USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im**

*Contributed Writers:*
**Mam Yin, Kim Phien**
*Advertising Department*

**Soben Pin**
KhmerPostUSA@gmail.com
**267-253-3947**

**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Mong Meng**

~~~~~

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.

~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year.
Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

~~~

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# កម្ពុជាបាត់ឱកាសដោះស្រាយ បញ្ហាព្រំដែនដីគោក និងសមុទ្រ

**វិភាគព្រឹត្តិការណ៍អន្តរជាតិ ដោយ : សុខុម**

ឱកាសកិច្ចប្រជុំអាស៊ានលើកទី២០នេះជាឱកាសមួយដ៏មានតម្លៃដែលកម្ពុជាត្រូវមានតួនាទីយ៉ាងសំខាន់មួយក្នុងការលើកយកច្បាប់បូរណភាពដែនដីគោក និងទឹករបស់អន្តរជាតិ និងច្បាប់ការពារបូរណភាពដែនដីគោកនិងទឹករបស់អាស៊ានសម្រាប់ប្រទេសនីមួយៗក្នុងតំបន់មកដាក់ជារបៀបវីរៈ ដើម្បីពិភាក្សាដោះស្រាយក្នុងពេលនោះ ។

ការដោះដូរគំរោងពិភាក្សាជម្លោះដែនសមុទ្រចិនខាងត្បូង និងលើកយកមកពិភាក្សាក្នុងពេលនោះទេ ប្រទេសកម្ពុជាខាតខ្លាំងមែនទែន ទោះបីជាប្រទេសចិនឱ្យលុយរាប់រយកោដិ លានដុល្លារសហរដ្ឋអាមេរិក ដោយមិនបាច់ឱ្យខ្ចីក៏ដោយ ព្រោះរឿងនេះអាចជួយការពារអធិបតេយ្យភាពដែនដីគោក និងទឹក ក្នុងតំបន់ជាពិសេសចំពោះអធិបតេយ្យភាពរបស់ប្រទេសកម្ពុជាយើងផងដែរ ហើយសំខាន់ជាងនេះទៅទៀតនោះវារិតតែមានកំហុសយ៉ាងធ្ងន់ធ្ងន់ចំពោះប្រទេសជាតិជាសមាជិកនីមួយៗក្នុងតំបន់អាស៊ាន និងអន្តរជាតិ ។

ឧទាហរណ៍ : ប្រសិនបើការប្រជុំអាស៊ានលើកទី២០នេះ បានលើកយកការពិភាក្សាដោះស្រាយជម្លោះដែនសមុទ្រចិនខាងត្បូងមកពិភាគបានសម្រេចលទ្ធផលល្អជោគជ័យ អនាគតប្រទេសកម្ពុជា អាចលើកយកដំណោះស្រាយនេះ មកដោះស្រាយរឿងព្រំដែនគោកនិងទឹករបស់ប្រទេសកម្ពុជាដែលមានបញ្ហាជាមួយប្រទេសវៀតណាម និងប្រទេសថៃទៀតផង បញ្ហានេះជាកូនសោរដ៏សំខាន់មួយអាចជួយដោះស្រាយបញ្ហាព្រំដែនគោកនិងទឹករបស់ប្រទេសកម្ពុជាដូចគ្នានឹងនៅក្នុងសមុទ្រចិនភាគខាងត្បូង ដែលនឹងការពារអធិបតេយ្យភាពដែនដីគោកនិងទឹកបណ្តាសមាជិកអាស៊ានទាំង១០ផងដែរ ។

### ហេតុអ្វីក៏វៀតណាមមិនប្រតិកម្មនិងការកែប្រែរបស់លោក ហ៊ុន សែន ?

យួនកំពុងតែសម្ងំរិះរកមធ្យោបាយទប់ទល់ឥទ្ធិពលចិន នៅក្នុងរឿងទំនាស់ដែនសមុទ្រចិនភាគខាងត្បូង ប្រជុំកោះប៉ារ៉ាស៊ែល និងបញ្ហាមួយឥទ្ធិពល **តទៅទំព័រទី ០៥**
~~~

# ស្ថានទូតអូស្ត្រាលីនៅកម្ពុជាការពារ ហ៊ុន តូ តាមរយៈការទូត

ដោយ ៈសុខុម

វដ្ឋាភិបាលប្រទេសអូស្ត្រាលី បានរកឃើញបណ្តាញអ្នករត់ពន្ធថ្នាំញៀនយ៉ាងធំ ដែលពាក់ព័ន្ធជាមួយ ហ៊ុន តូ ដែលជាកូនលោក ហ៊ុន ណេង ចៅហ្វាយខេត្តកំពង់ចាមជាបងប្រុស


ហ៊ុន តូ
គ្រឿងញៀនចាប់បាននៅអូស្ត្រាលី

បង្កើតរបស់នាយករដ្ឋមន្ត្រី លោក ហ៊ុន សែន ក្នុងបណ្តាញរត់ពន្ធថ្នាំញៀនអន្តរជាតិ និងលាងលុយក្រខ្វក់របស់ឈ្មួញទុច្ចរិត ក្នុងប្រទេសកម្ពុជា រវាងប្រទេសអូស្ត្រាលី ។

តាមការដកស្រង់បទសម្ភាសន៍មួយរបស់វិទ្យុអាស៊ីសេរីជាមួយលោក ហ៊ុន តូ បានអះអាងថា "ប្រសិនបើលោកចង់ដឹងខ្លាំងលោកទៅទាក់ទងជាមួយស្ថានទូតអូស្ត្រាលី ខ្ញុំគ្មានពាក្យអីនិយាយជាមួយលោកទេ។ លោកត្រូវដឹងថា ប្រសិនបើជាស្ថានទូតអូស្ត្រាលីនៅស្រុកខ្មែរបដិសេធរឿងស្អី ខ្ញុំចេញចូលអូស្ត្រាលីរាល់ថ្ងៃគ្មាននរណាហាមឃាត់ខ្ញុំទេ"។

ស្ថានទូតអូស្ត្រាលីប្រចាំនៅប្រទេសកម្ពុជា បានឱ្យដឹងថា "រដ្ឋាភិបាលប្រទេសអូស្ត្រាលីមានគំរោងចាប់ខ្លួន លោក ហ៊ុន តូ នៅទីក្រុងម៉ែលប៊ូន ប៉ុន្តែត្រូវខកខានទៅវិញ ដោយសារតែស្ថានទូតរបស់ខ្លួនប្រចាំនៅប្រទេសកម្ពុជាមិនព្រមចេញទិដ្ឋិការឱ្យ ហ៊ុន តូ ធ្វើដំណើរទៅប្រទេសអូស្ត្រាលី"។ ពេលជាមួយគ្នានេះដែរមន្ត្រីស្ថានទូតអូស្ត្រាលីបានមានប្រសាសន៍ថា" រដ្ឋាភិបាលប្រទេសអូស្ត្រាលីមិនចង់មានវិវាទការទូតជាមួយប្រទេសកម្ពុជា ។ តើការអះអាងរបស់ទូតអូស្ត្រាលីប្រចាំនៅប្រទេសកម្ពុជាត្រឹមត្រូវដែរឬទេ បានជាអាជ្ញាធរអូស្ត្រាលីមិនហ៊ានចាប់ហ៊ុនតូ ?

ការជួញដូរគ្រឿងញៀនជាបទឧក្រិដ្ឋអន្តរជាតិដ៏ធំ តាមប្រភពមន្ត្រីជាន់ខ្ពស់ក្រសួងមហាផ្ទៃ សូមមិនបញ្ចេញឈ្មោះ បានពិភាគលើរឿងនេះថា រឿងគ្រឿងញៀននេះធំណាស់ គ្មាននរណាម្នាក់ហ៊ានប៉ះពាល់ ហ៊ានធ្វើដឹងឮជាមួយទេ ព្រោះវាមានមេរៀនច្រើនណាស់មកហើយ មិនអាចធ្វើអ្វីបានទេ បើប្រទេសអូស្ត្រាលីមិនហ៊ានទៅហើយ នៅក្នុងប្រទេសកម្ពុជារឹតតែមិនហ៊ានទៅទៀត វានឹងក្លាយទៅជាចរាចរគ្រឿងញៀនយ៉ាងធំ រីករាលដាលក្នុងប្រទេសកម្ពុជា ។ ប្រទេសអូស្ត្រាលីធ្វើនេះ ងាប់ប៉ូលិសអាំងទែរប៉ូល ប្រទេសកម្ពុជា ហើយប៉ូលិសអាំងទែរប៉ូលកម្ពុជាក៏មិនហ៊ានទាក់ទង ឬសហការណ៍ជាមួយប៉ូលិសអន្តរជាតិនៃប្រទេសអូស្ត្រាលីទៀតដែរ"។

មន្ត្រីការទូតជើងចាស់មួយរូបបានមានប្រសាសន៍ថា" មានរឿងអាស្រូវជាច្រើនណាស់ ដែលអ្នកដឹកនាំប្រទេស អ្នកការទូតស្ទើរតែគ្រប់ប្រទេសយកវិស័យការទូតនេះធ្វើជាយានដើម្បីបម្រើផលប្រយោជន៍ផ្ទាល់ខ្លួន រហូតដល់មេដឹកនាំប្រទេសខ្លះ ហ៊ានយកទ្រព្យសម្បត្តិប្រទេសខ្លួនធ្វើ សួយសារអាករ ទៅឱ្យប្រទេសមានអំណាច ដើម្បីសុំការគាំទ្រជួយរក្សាអំណាចនិងឥទ្ធិពលរបស់ខ្លួន ។ ចំពោះប្រវត្តិសាស្ត្រប្រទេសកម្ពុជាយើងក៏មានដែរ ។

ប្រទេសអូស្ត្រាលីជាប្រទេសធ្វើនយោបាយសន្សំសុខយករួចខ្លួន ច្រើនតែប្រើចំណងការទូតដែលហៅថា អនុសារណៈនៃការយោគយល់គ្នារវាងប្រទេសទាំងពីរ ។ ចំពោះរឿងដែលមន្ត្រីស្ថានទូតបាននិយាយថា មិនចង់ឱ្យមានការវិវាទការទូតជាមួយប្រទេសកម្ពុជា គឺជាលេសឆ្លើយយករួចខ្លួន ដោយសារតែរឿងនេះបានលាតត្រដាងលើទំព័រសារព័ត៌មានអន្តរជាតិ រឿងការទូតទាក់ទងក្នុងរឿងគ្រឿងញៀនជាបញ្ហាមួយធំណាស់ មិនរឿងចេះតែនិយាយដូចរដ្ឋទូតប្រចាំនៅប្រទេសកម្ពុជា បាននោះទេ ៕

តមកទំព័រទី ៤

## កម្ពុជាបាត់ឱកាសដោះស្រាយ....

នយោបាយនិងសេដ្ឋកិច្ចរបស់ចិនវាយឡុកចូលក្នុងតំបន់ឥណ្ឌូចិនជាពិសេសប្រទេសកម្ពុជា និងឡាវ ។ ចំពោះមេដឹកនាំវៀតណាមមិនប្រតិកម្មនិងទង្វើរបស់លោក ហ៊ុន សែន ដែលធ្វើការដោះដូរគំរោងពិភាក្សាជម្លោះដែនសមុទ្រចិនភាគខាងត្បូងនោះទេ ព្រោះវាជាបញ្ហារួមរបស់បណ្តាប្រទេសទាំង៤ ក្នុងតំបន់អាស៊ានត្រូវទាមទារដោះនៅពេលនោះ ។ ផ្ទុយទៅវិញវៀតណាមអាចរឹតតែសប្បាយចិត្តដោយឃើញទង្វើរបស់លោក ហ៊ុន សែន ធ្វើឱ្យប្រជាពលរដ្ឋខ្មែរច្រឡំដោយនឹកស្មានថា វៀតណាមកំពុងបន្ទន់ឥរិយាបថជាមួយចិនដោយយកអាស៊ានធ្វើជាខែលវៀតណាមពន្លឿនការយកដីប្រទេសខ្មែរនៅតាមបណ្តោយបន្ទាត់ព្រំដែន និងដែនសមុទ្រឱ្យអស់សិន ទើបងាកទៅរកជម្លោះដែនសមុទ្រចិនភាគខាងត្បូងវិញម្តងទៀត។ ដើម្បីកុំគ្រោះថ្នាក់ដល់នយោបាយប្រទេសវៀតណាមដែលត្រូវទុករឿងនេះមួយដោយឡែកសិន ព្រោះវាមិនមែនជាការងាយស្រួលដូចការលេបត្របាក់ដូចយកទឹកដីប្រទេសកម្ពុជានោះទេ ។

ទោះជាអ្នកវិភាគ សុខ ទូច,រស់ ចន្ទ្រាបុត្រ .ផៃ ស៊ីផាន គាំទ្ររាជរដ្ឋាភិបាលខំប្រឹងប្រែងបង្វែងសភាពការណ៍នយោបាយយ៉ាងណាក៏ដោយ វាមិនអាចលាក់ការពិតឡើយ ព្រោះសភាពការណ៍នយោបាយប្រទេសកម្ពុជាបច្ចុប្បន្ននេះ មានអ្នកសង្កេតការណ៍ជាតិ និងអន្តរជាតិតាមដានច្រើនណាស់ ។ លោកទាំងបីប្រាកដជាយល់យ៉ាងច្បាស់នូវប្រសាសន៍ភារធារីទូតសហរដ្ឋអាមេរិក លោក ជេហ្វ ដៃហ្គល ថា សហរដ្ឋអាមេរិក បន្តគាំទ្រអាស៊ានក្នុងការបន្តដោះស្រាយជម្លោះនៅសមុទ្រចិនភាគខាងត្បូងដោយសន្តិវិធី ហើយសហរដ្ឋអាមេរិក មិនមានទិនការគាំទ្រភាគីណាមួយនៃជម្លោះដណ្តើមដែនកោះនោះទេ៕

# ជំងឺមហារីកពោះវៀនធំ និងតូច

បើទោះជាដឹងថា ជំងឺមហារីកគូថអាចការពារ និងព្យាបាលបានក៏ដោយ ក៏នៅមានជំងឺដែលកើតថ្មី១៥ម៉ឺនករណី និងមនុស្សស្លាប់៥ម៉ឺននាក់



Dr. Denne Thomas-Patterson, Family Medicine Physician at Albert Einstein Medical Center in Philadelphia, PA, and the Einstein Director of Medical Community Outreach

ទៀតរៀងរាល់ឆ្នាំ ។

ឧបសគ្គដែលរំខានការទប់ស្កាត់កំណើននៃជំងឺនេះ គឺការមិនទៅឱ្យគ្រូពេទ្យឆ្លុះមើលធ្វើតេស្ត ហើយនិងមិនកំចាត់ចោលនូវជំនឿមួយចំនួនដែលធ្វើមិនឱ្យគេសម្រេចចិត្តទៅរកគ្រូពេទ្យពិនិត្យអាការៈរោគមហារីកនេះទេ ។

ដែលហៅថា ជំងឺមហារីកពោះវៀនធំ ឬគូថនេះ គឺរោគមហារីកវាទៅទុំលើពោះវៀន ឬនៅផ្នែកចុងគេបង្អស់នៃពោះវៀន គឺគូថ ។ គេសម្បូរឃើញជំងឺនេះណាស់នៅ ស.រ.អា នេះ ការសិក្សាបានឱ្យដឹងថា កត្តាសំខាន់ដែលបណ្តាលឱ្យកើតជំងឺនេះ គឺរបៀបតាមចំណី -អ្វីៗដែលយើងបរិភោគនិងមានផលវិបត្តិទៅលើសុខភាពនាអនាគតជាមិនខាន ។ ការបន្ថយម្ហូបជាតិសាច់សត្វ ឬម្ហូបចំអិន ហើយបង្កើនចំណីជាផ្លែឈើ បន្លែ គ្រាប់ធញ្ញជាតិ ឬសណ្តែក ឬមើមផ្សេងៗ គឺនិងបង្កើនកិច្ចការពារសុខភាពពុំឱ្យមានជំងឺនេះបាន ។ ដូច្នេះបើយើងបរិភោគផ្លែឈើ ឬបន្លែពីក្មេងវានឹងការពារសុខភាពនៅពេលធំបាន ។

ជំងឺនេះមានពេលខ្លះពុំមានរោគសញ្ញាអ្វីនៅខាងក្រៅទេ តែបើយើងមានឈឺពោះមានឈាមក្នុងលាមក ឬមានលាយលាមកពណ៌ខ្មៅ ឬក៏ក្តៀន ឬបង្ហាញភាពអស់កម្លាំង ឬចុះទម្ងន់ ឬក៏ឧស្សាហ៍កូរពោះវៀន ឬក៏ឱស្សាហ៍កូរពោះវៀនត្រូវតែទៅពិគ្រោះជាមួយ វេជ្ជបណ្ឌិតភ្លាម ។

ជាទូទៅមនុស្សគ្រប់រូបគួរចាប់ផ្តើមទៅឆ្លុះមើលចាប់ពីអាយុ៥០ឆ្នាំឡើងទៅតែបើមានគ្រួសារ ឬឪពុកម្តាយធ្លាប់មានជំងឺនេះ គួរតែទៅពិនិត្យឆ្លុះមើលតាំងពី១០ឆ្នាំមុនទៀត ។ គេច្រើនពិនិត្យដោយឆ្លុះមើលក្នុងពោះវៀនតែម្តង តែមនុស្សជាច្រើនតែងខ្លាចវិធីនេះ បើទោះជាពិនិត្យតែ១១ទៅ២០នាទីប៉ុណ្ណោះ អាចបញ្ចៀសជំងឺមហារីកនេះបានក៏ដោយ ។

**ចូរចងចាំថា:** ជំងឺមហារីកគូថនេះ កើតនៅមនុស្សប្រុស ដូចគ្នា និងមនុស្សស្រីដែរ ច្រើនកើតនៅលើមនុស្សចាស់អាយុលើសពី៥០ឆ្នាំ តែក៏មានក្មេងកើតដែរ -ជំងឺនេះកកើតលើពួកស្បែកសក៏ដូចសាសន៍ដ៏ទៃដែរ ។ អត្ថបទជាភាសាអង់គ្លេសដោយវេជ្ជបណ្ឌិតនៃមន្ទីរពេទ្យអាញស្តាញ ។

## Colon and Rectal Cancer :

Despite being one of the most preventable and curable cancers, over 150,000 new cases of colorectal cancer are diagnosed, and over 50,000 people die from this disease each year.

One big obstacle in preventing this disease is increasing awareness that important screening test are available and getting rid of the myths that prevent poeple from taking the steps to be screened.

**It´s time to set the record straight!**

Colon or rectal cancer is a disease in which cancer cells from in the colon (also known as the intestines )or rectum (last part of the intestines).

Colon cancer is very common in the US and some studies indicate that diet is a key factor. Everything that we eat has an effect on future health. Decreasing the animal products and processed foods while increasing fruits, vegetables, nuts, beans, and seeds can have colon cancer protective effects. in addition, some research has show that a diet hight in fruits and vegetables early in life shows some protection later in life. So parent´s choices for their children early on an can make a difference.

Many times there are on waring signs of colorectal cancer. However, you should talk with your doctor if you have any abnormal symptoms such as blood in your stools, black tarry stools, new constipation, abdominal pain, unexplained fatigue, unexplained weight loss, or a change in how often you have a bowel movement.

It is recommended that everyone begin colon cancer screening at the age of 50. However, if your parents or siblings have had colon cancer then you need to be screened at least a decade earlier. Also, you may be screened earlier if have any abnormal symptoms as we listed above. there are afew ways to check for colon cancer but a test called a colonoscopy is the test most frequently recommended that this time. Many people are embrarrassed or afraid to get this test but it is a 15-20 minute test that millions of people a year get to decrease the risk of getting colon risk of getting this (and other) forms of cancer.

**3 myths to dispel !**

1) MYTH #1 Colon cancer is a man´s disease:

**Truth :** The American Cancer Societ, State that the risk of developing colorectal cancer is almost the same for both men and women (about 1 in 19 lifetime risk for men to develop this cancer and about 1 in every 20 people for women).

**2) MYTH #2 Only people over 50 get colorectal cancer:**

**Truth :** It is true that most cases of colorectal cancer occur in people over age 50, there are younger people who develop this disease. So it is important to know your family history and seek medical attention if you are having any abnormal symptoms (see above) regardless of your age.

**3) MYTH #3** Colorectal cancer is most common is Caucasian people.

**Truth :** The Center from Disease Control reports that african americans have the highest rates of both getting and dying from colon cancer . Caucasians have the second highest




rate, followed by Hispanis, Asian/ Pacific Islanders, and American indian/ Native Alaskans.

# ASRIC

**ខ្មែរផូស:** អង្គការ ASRIC ដឹកនាំដោយអ្នកស្រីបណ្ឌិត លក្ខិណា ទូ កំពុងស្វែងរកថវិការថ្មីទៀត ដើម្បីរៀបចំដំណើរកម្មវិធី "អ្នករងគ្រោះក្លាយជាសាក្សី" ក្នុងបណ្តឹងចំពោះក្រុមខ្មែរក្រហមទៅតុលាការអន្តរជាតិនៅកម្ពុជា ។

អ្នកស្រី លក្ខិណា ទូ ជាបណ្ឌិតខាងចិត្តសាស្ត្រធ្វើការសិក្សាច្រើនឆ្នាំ និងបញ្ចេញនិក្ខេបទជាច្រើនស្តីពីវិបត្តិផ្លូវចិត្តកើតឡើងក្នុងសហគមន៍ខ្មែរដែលបណ្តាលឱ្យកើតជាបញ្ហាសុខភាពបញ្ហាសង្គមយ៉ាងច្រើនប្រការ ចំពោះខ្មែរអាមេរិកាំងដែលតាំងពី៣០ឆ្នាំមកហើយមករស់នៅលើទឹកដីស.រ.អាពុំដែលមានអ្នកប្រាជ្ញវិទ្យាសាស្ត្រណាធ្វើការសិក្សាដ៏ជ្រៅជ្រះដូច្នេះទេ ។

កម្មវិធីដែលអ្នកស្រីបានផ្តើមពីឆ្នាំ២០០៩មកទល់ថ្ងៃនេះ គឺទាក់ទងជាមួយសមាជិកសហគមន៍ខ្មែរជុំវិញ ស.រ.អា ឱ្យរំលឹកអតីតកាលស្តីពីភាពរងគ្រោះ ឬទារុណកម្មដែលបានទទួលនាជំនាន់គ្រប់គ្រងដោយរបបខ្មែរក្រហម-ចងក្រងតាមគន្លងផ្លូវច្បាប់ ហើយយកទៅសរសេរជាពាក្យបណ្តឹងទៅតុលាការអន្តរជាតិនៅទីក្រុងភ្នំពេញឱ្យរកយុត្តិធម៌ឱ្យខ្លួន និងក្រុមគ្រួសារខ្លួន ។ ក្នុងដំណើរនេះបណ្ឌិត ទូ បានប្រមូលពាក្យចំនួន១៧០បណ្តឹងទៅដាក់បញ្ជូនទៅដែលតុលាការទទួលយកបានទាំងអស់ជាផ្លូវការ ហើយបានប្រើប្រាស់ដើមបណ្តឹងនោះខ្លះហើយនៅក្នុង


អ្នកស្រីបណ្ឌិត លក្ខិណា ទូ

សំណុំរឿង០០១ ។ នៅក្នុងសំណុំរឿង០០២ដែលកំពុងដំណើរការណ៍ចោទប្រកាន់ចំពោះមេខ្មែរក្រហមបីរូបទៀត និងត្រូវប្រើសាក្សីដែលជាជនរងគ្រោះរស់នៅឯបរទេសនោះ ខ្លះទៀតហើយនៅមានសំណុំរឿងលេខ០០៣ និង០០៤ ដែលនឹងត្រូវការសាក្សីទៅឆ្លើយបង្ហាញភស្តុតាងនៅមុខចៅក្រមបន្តបន្ទាប់គ្នា ។ បណ្ឌិត ទូ ចង់ជួយបងប្អូនខ្មែរ ដែលក្លាហានហ៊ានបញ្ចេញកំហឹងពីក្នុងខ្លួនហ៊ានសរសេរពាក្យបណ្តឹងឱ្យទៅប្រឈមមុខនឹងចុងចោទនៃអំពើយង់ឃ្នងពីអតីតកាលឱ្យបានឃើញផ្ទាល់ពីដំណើរនៃការរកយុត្តិធម៌ពិតប្រាកដឱ្យខ្លួននៅទីក្រុងភ្នំពេញដែលនឹងត្រូវធ្វើឡើងនាពេលឆាប់ៗខាងមុខ ។ ក្នុងនិក្ខេបទរបស់ខ្ញុំបណ្ឌិត លក្ខិណា ទូ បញ្ជាក់ថា "ការប្រឈមមុខជាសាក្សីនេះគឺជាការព្យាបាលផ្លូវចិត្តយ៉ាងស័ក្តិសិទ្ធដោយប្រើប្រព័ន្ធយុត្តិធម៌ដែលនឹងជឿបាន" ។

អត្ថបទនេះជាការអំពាវនាវរកថវិការសម្រាប់កិច្ចការចុងក្រោយជូនដំណើរពលរដ្ឋសហគមន៍ខ្មែរឱ្យប្រើវិធីព្យាបាលផ្លូវចិត្តដែលគ្រាំគ្រាយូរឆ្នាំ ហើយឱ្យទទួលបាននូវភាពធូរស្បើយតាមផ្លូវវិទ្យាសាស្ត្រសំរាប់ព្យាបាលដ៏ថ្មីស្រឡាងនេះ ។ ខ្មែរផូស ស.រ.អា ធ្លាប់គាំទ្រសកម្មភាពនេះ ហើយនៅតែបន្តគាំទ្រសកម្មភាពបណ្ឌិត លក្ខិណា ទូ យ៉ាងស្មោះស្ម័គ្រ ៕




C/o Asian Pacific American Institute (a/p/a) at
New York University
41-51 E. 11street 7th Floor, New York, NY 10003
Fax: 212-995-4705, Phone: 212-300-5775
E-mail: apa.asric-khmer.justice@nyu.edu
Website: http://www.apa.nyu.edu/ASRIC or
www.asricjustice.org

The Applied Social Research Institute of Cambodia (ASRIC) is a volunteer organization committed to human and civil rights. Through dialogue and grassroots activism, ASRIC is dedicated to working on issues affecting Cambodia Americans and the Cambodian diaspora at large. ASRIC is steadfast in its commitment to facilitate justice, healing, and reparation for survivors of the Killing Fields where an estimated 1.7 million Cambodians died as a result of execution, starvation, forced labor, and disease. ASRIC has implemented innovative programs since its founding. One such program is the Cambodian Diaspora Victims' Participation Project (CDVPP), which aims to provide Cambodian American survivors the opportunity to participate in the Extraordinary Chambers in the Courts of Cambodia (ECCC), also commonly referred to as the Khmer Rouge Tribunal.

The goal of the project is to work with the communities across the United States to transform victims into witnesses and facilitate individual and communal **Continue page 15**

មានអ្វីប្លែក

# ភូមាបោះជំហានទៅរកលទ្ធិប្រជាធិបតេយ្យៈ



●វាជារឿងចម្លែកមួយដែលតាំងពីកន្លះសតវត្សរ៍ចុងក្រោយនេះ កងទ័ពបានកាន់កាប់អំណាចផ្តាច់ការយ៉ាងរឹងមាំប្តូរឈ្មោះប្រទេសពីភូមាទៅបៀងម៉ា(ឈ្មោះដើម) ហើយប្តូរទីក្រុងពីរ៉ង់គូនទៅណាយភីដ ។ ស្រាប់តែឆ្នាំ២០១១ មានការផ្លាស់ប្តូរនយោបាយផ្តាច់ការរបស់កងទ័ពបានអ្នកស្រី ស៊ូជី ជ័យលាភី ណូបែលភូមាបានត្រូវដោះលែងបន្ទាប់ពីឃុំខ្លួនឱ្យនៅផ្ទះចំនួន២០ឆ្នាំរួចមក ខែ មេសា ២០១២ លោកស្រី ស៊ូជី និងសមាជិកគណបក្ស ND2 បានចូលកាន់តំណែងនៅសភាជាតិ ទោះជាមួយកូនផ្នែកតូចនាពេលនេះ ក៏ជាជំហានដ៏ធំមួយដែលមិននឹកស្មានដល់ជាមុន ។ ដង្ហើបនយោបាយរបស់ ASEAN និង អ.ស.ប រួមដៃដោយស.រ.អាពលរដ្ឋភូមាបានដកដង្ហើមសេរីភាពខ្លះៗហើយ ។

**-៤កុម្ភៈ** លោក ថាំង សាំង បានជាប់ឆ្នោតជាប្រធានាធិបតីសាធារណរដ្ឋសហព័ន្ធបៀងម៉ា

**-៣០ មិនា** រំលាយអង្គការនយោបាយ

**-១៨សីហា** ប្រធានាធិបតីអញ្ជើញជនជាតិភាគតិចមកធ្វើការចរចារខ្លះបានកាន់អាវុធចូលព្រៃ

**-១៩ សីហា** លោកស្រី អិន សាន់ ស៊ូជី បានត្រូវអញ្ជើញឱ្យជួបប្រធានាធិបតីនៅរដ្ឋធានីណាភីដ

**-១៦កញ្ញា** បន្ថយការត្រួតពិនិត្យលើអាំងទែណេតសាធារណជនអាចចូលប្រើបាន

**-៣០កញ្ញា** សង្គមស៊ីវិលភូមាបានប្រមូលគ្នាប្រឆាំងនឹងសំណង់ទំបន់អគ្គិសនីដោយជំនួយចិន លោកប្រធានាធិបតី សាំង ថាំង បញ្ជាឱ្យបញ្ឈប់សំណង់នោះ ។

**-១២ តុលា** ដោះលែងអ្នកទោសនយោបាយ ២២០នាក់

**-១៥វិច្ឆិកា** សហគមន៍អាស៊ានចេញប្រកាសឱ្យមានប្រធានមកពីភូមានៅឆ្នាំ២០១១

**-១៨ វិច្ឆិកា** គណបក្ស LND គណបក្សលោកស្រី អន សាន់ ស៊ូជី បានសម្រេចជាឯកច្ឆន្ទចូលរួមជាមួយគណបក្សនយោបាយចូលប្រឡូកការបោះឆ្នោតនៅខាងមុខ

**-១ធ្នូ** រដ្ឋលេខាធិការអាមេរិកាំង លោកស្រី ហ៊ីឡារី ក្លីងតុន បានទៅធ្វើទស្សនៈកិច្ចប្រវត្តិសាស្ត្រនៅភូមាឆ្នាំ ២០១២

**-១២មករា** កិច្ចព្រមព្រៀងរដ្ឋាភិបាល និងឧទ្ទាមការេន ថាឈប់បាញ់គ្នាពួកការេនបានកាន់កាំភ្លើងចូលព្រៃឧទ្ទាមតាំងតែពីឆ្នាំ ១៩៤៨

**-១៣ មករា:** ដោះលែងអ្នកទោសនយោបាយមួយសារទៀត

**-១មេសា** បោះឆ្នោតមួយភាគរយអាសនៈ ៤៨នៅសភាដែលមានសមាជិក៥០០ អាសនៈ ថ្ងៃនោះកាសែតនៅភ្នំពេញស្ទើរតែទាំងអស់បានចាប់អារម្មណ៍យ៉ាងខ្លាំងពីការបោះឆ្នោតលើកនេះនៅភូមា

កាលបរិច្ឆេទនេះជាអន្តរកាលប្រកបដោយក្តីសង្ឃឹមរបស់ពលរដ្ឋភូមាដែលការកែទម្រង់ក្នុងរយៈពេលពីរឆ្នាំចុងក្រោយរបស់លោក ផាំង សាំង ធ្វើបានច្រើនលើស២០ឆ្នាំនៃក្រុមផ្តាច់ការនិយម យោធាភូមាទៅទៀត ។ លោកស្រី អន់សាន់ ស៊ូជី ត្រឡប់ចូលឆាកនយោបាយវិញជាវីរៈនារី តែ ពេលនេះពុំទាន់មានសញ្ញាថាក្រុមយោធានឹងបន្ថយឥទ្ធិពលខ្លួនលើចលនារត់ពន្ធអាភៀនរបស់ខ្លួននៅឡើយទេ ៕

# គណបក្សសិទ្ធិមនុស្ស
## នៅជេនស៊ីវេនា ទៅកាពីតូលហ៊ីល

សាខាគណបក្សសិទ្ធិមនុស្ស ស.រ.អា ដឹកនាំដោយលោក សារ៉ង សេង បានធ្វើសេចក្តីថ្លែងការណ៍អំពីការរំលោភសិទ្ធិមនុស្សដោយរដ្ឋាភិបាលកម្ពុជាទៅជូនសមាជិកសភានៅកាពីតូលហ៊ីលរដ្ឋធានីវ៉ាស៊ីនតោនកាលពីចុងខែមិនាកន្លងទៅនោះ ។ សមាជិក៨រូបនៃសាខាបក្សបានឱ្យដឹងថា សេចក្តីថ្លែងការណ៍នោះផ្តោតទៅលើការរត់ពន្ធជួញដូរមនុស្សដែលនឹងទៅគាំទ្រពាក្យបណ្តឹងដោយអង្គការសិទ្ធិមនុស្សដែលបានដាក់ពាក្យបណ្តឹងទៅសភាអាមេរិកាំងរួចទេហើយ ។ បន្ថែមពីនោះគណបក្សសិទ្ធិមនុស្សខ្មែរបានលើកករណីបីទៀតសំរាប់ឱ្យសមាជិកសភាអាមេរិកាំងបានដឹងឮពីដំណើរការមិនប្រក្រតីនៃរដ្ឋាភិបាលកម្ពុជាដូចជា :



**១-** ការបណ្តេញរាស្ត្រម្ចាស់ដីចេញ ហើយប្រើកម្លាំងប៉ូលិស និងយោធាយកសម្បត្តិរាស្ត្រ

**២-**នយោបាយការអប់រំមិនស្មើភាពគ្នារវាងជនក្រីក្រនៅតាមជនបទ និងទីក្រុងនៃកូនអ្នកមានអំណាច

**៣-** អំពើពុករលួយក្នុងជួររដ្ឋាភិបាលដែលជាជំងឺសង្គមរ៉ាំរ៉ៃពុំមាននរណាចង់ព្យាបាល

តំណាងគណបក្សសិទ្ធិមនុស្សបានជួបពិភាក្សាជាមួយសមាជិកសភាកាលីហ្វ័រនីញ៉ា ជានាយកបុគ្គលិក-សមាជិកសភា ថម ម៉ារីណូ មកពីដែនស៊ីវេនា និងសមាជិកសភាម៉ាយហ្វិតបាទ្រីត ៕

តមកពីទំព័រទី ៩

# បង្កើតក្រុងខ្មែរនៅឡុងប៊ិច

មានលោក វង្ស វ៉ស ។ល។ និង ។ល។

**ខ្មែរផុស :** តើគណៈកម្មការ ឬក៏សាលាក្រុងដែលជាអ្នករៀបចំឱ្យគំនិតថា តើក្រុងនឹងរៀបចំយ៉ាងណា ? នឹងអាចក្លាយទៅជាអ្វីជាបន្តទៅទៀត តើមានគំរោងរៀបចំក្រុងរបៀបណាហើយ ឬនៅ ?

**វ៉ាស្នា អួន:** គេបានស្នើរយោបល់មកយើងពីកំណត់តំបន់មកហើយ ហើយសាលាក្រុងជាអ្នកសម្រេច

**ខ្មែរផុស :** ដើម្បីបានជាក្រុងខ្មែរតើគណៈកម្មការមានស្នើ ឬទេ ថាត្រូវមានអ្វីខ្លះ ?

**វ៉ាស្នា អួន :** រូបដែលដាក់តាមផ្លូវ មីឌិលសិច និងវេសហ្វិតគឺហ្នឹងហើយ ដែលក្រុងទទួលយល់ព្រម

**ខ្មែរផុស :** ខ្ញុំចង់សួរថា បើសម្លឹងទៅ៥ឆ្នាំទៅមុខគេអាចស្រមៃ បានទេថា រូបភាពក្រុងនោះជាអ្វី ? នៅ " ឆាយណាថោន" គេឃើញក្លោងទ្វារក្បាច់ចិន ពីក្លោងទ្វារនោះទៅសមាគមចិន គេទាមទារឱ្យមានសញ្ញានោះពណិនេះ ដែលជារូបភាពនៃវប្បធម៌របស់គេ តើក្រុងខ្មែរនឹងមានរូបភាពជាអ្វី ?

**វ៉ាស្នា អួន :** បាទមាន ! ដូចជានៅធុងសម្រាម ឬនៅកៅអីសួនច្បារ ឬនៅសួនលេងបាល់ទះ វ៉ូឡីខ្មែរ ហៅសួនប៉ៃលិន គេធ្វើកន្លែងលក់ម្ហូប ដែលមានក្បាច់ខ្មែរ អាចសំគាល់ថាជាខ្មែរបាន ហើយដូចជាលោកថា នៅ៣ឬ៥ឆ្នាំទៅមុខទៀត នឹងមានក្លោងទ្វារក្បាច់ខ្មែរដែរ ដែលចូលមកដល់ពេលណានឹងមានក្បាច់ក្បូរគំនូរ ឬជាពណិជាវប្បធម៌ខ្មែរ រីឯក្លោងទ្វារនោះទៀត សាលាក្រុងគេមិនយល់ជំទាស់នឹងយើងទេ តែគេនឹងជួយខ្លះខាងខ្មែរត្រូវជួយចូលរួមចំណែកលខ្លះ ដូចជាខាងក្រុមពាណិជ្ជករខ្មែរជាពិសេសបាទ !

**ខ្មែរផុស :** ខ្ញុំនឹកទៅដល់កេរិតស្អាតស្រស់បស់នៃភូមិខ្មែរ ដូចជានៅមុខហាងចិញ្ចើមថ្នល់បាក់បែកមានសម្រាម តើសហគមន៍ខ្មែរនឹងជួយចូលរួមដែរ ឬទេ ?

**វ៉ាស្នា អួន :** យើងដាក់រូបសញ្ញាមានក្លោងទ្វារ ហើយការថែទាំ គឺសង្ឃឹមទៅលើបងប្អូនយើងទាំងអស់គ្នាជាអ្នកជួយថែទាំចុះហើយ កុំគិតថា ហ្នឹងជារបស់ក្រុងទាល់តែក្រុងទើបជាអ្នកសំអាតនោះទេ ធ្វើដូច្នេះ ទើបស្អាតទៅកើត

**ខ្មែរផុស:** មានគំនិតមួយទៀតដែរថា ក្រុងគួរតែធ្វើថ្នល់ចិញ្ចើមថ្នល់ឱ្យស្អាតភ្លឹង ហើយប្រគល់ភូមិស្អាតនោះឱ្យទៅ " **ក្រុងខ្មែរ** " នឹងបន្តភាពស្អាតនោះជូនបន្តទៅទៀតបាន តើមានគំនិតនេះទេ ?

**វ៉ាស្នា អួន :** ការធ្វើថ្នល់ក្រុង ឬចិញ្ចើមថ្នល់ថ្មីនោះមិនចាំបាច់តែទាល់តែក្រុងខ្មែរ ទើបគេធ្វើនោះទេ ឱ្យវាមានបាក់បែក ឬត្រូវជួសជុលកន្លែងណា ខ្ញុំក្នុងតួនាទីជាក្រុមប្រឹក្សាក្រុងអាចធ្វើសំណើរឱ្យគេមកជួសជុលផ្លូវបែកបាក់ទាំងនោះបានដែរ ដើម្បីឱ្យអ្នកគ្រប់គ្រងការងារសាធារណៈឱ្យមកជួសជុល រីឯអ្នកថ្មើរជើងត្រូវឆ្លងថ្នល់ខ្ញុំឃើញនៅលើផ្លូវមីឌិលសិចឆ្លងទៅហាង "យ៉ាមី " ឥតមានគំនូសលើថ្នល់ឱ្យអ្នកឆ្លងទេ ឡានក៏មានច្រើន ហើយមិនបានបង្អង់ ឬឈប់ឱ្យអ្នកដំណើរដើរខ្ញុំនឹងស្នើឱ្យមានទៀត

**ខ្មែរផុស:** ខ្ញុំឃើញថា មានគំរោងឱ្យមានការផ្លាស់ប្តូរខ្លះដែរ តែដើម្បីធ្វើឱ្យបានសំរេច គេត្រូវមានធនធាន តើអ្នកណាជាអ្នកផ្តល់ធនធានសំរាប់ធ្វើការឱ្យក្រុងខ្មែរនោះ ?

**វ៉ាស្នា អួន:** ខ្ញុំនឹងជំរុញឱ្យមានកាស្នើរកធនធានទៅក្រុមប្រឹក្សាក្រុង សុំទៅសហពន្ធពីរដ្ឋក្តី និងបង្គ្រប់ដោយក្រុមមូលនិធិនានា ដែលជាអ្នកជួយដែរនោះ ហើយក៏មានក្រុមឯកជនពាណិជ្ជករខ្មែរក៏គេអាចជួយដែរ ឬគេនាំគ្នាជប់លៀងរៃអង្គាសខ្លះដូចដែលធ្លាប់មានធ្វើរួចមកហើយ...

**ខ្មែរផុស:** តើគេអាចបង្វែកាន់លើអចលនវត្ថុមកឱ្យការគ្រប់គ្រងក្រុងខ្មែរបានដែរ ឬទេ ?

**វ៉ាស្នា អួន :** កាត់កើអចលនវត្ថុនោះ ក្រុងក៏យករដ្ឋក៏យកយើងក៏ចង់បានខ្លាំងពេកភូមិនៃអ្នកដ៏ទៃឯនោះនឹងមានការច្រណែន ដូច្នេះយើងត្រូវតែរកតុល្យភាពលើរឿងហ្នឹង

**ខ្មែរផុស :** យើងធ្លាប់ឮថា ក្រុងខ្មែរនៅឡុងប៊ិចបានថវិកាសម្រាប់ការងារក្រុងខ្លួនពីកាត់លើអចលនវត្ថុដែលមានទីតាំងក្នុងតំបន់របស់ខ្លួនការកែលំអរក្រុងខ្មែរនៅឡុងប៊ិចកាលីហ្វ័រញ៉ា

**វ៉ាស្នា អួន :** យើងទើបនឹងកើតបានជាធ្វើសេចក្តីសំរេចមួយចំនួនហើយនឹងបន្តការពិចារណាតទៅទៀត មិនមែនបានតែប្លាកបួននោះហើយចប់ត្រឹមហ្នឹងនោះទេ !

**ខ្មែរផុស :** ខ្ញុំឃើញថា ក្រុងខ្មែរ គឺកំរិតតែត្រឹមផ្លូវពាណិជ្ជកម្មខ្មែរ ចុះផ្លូវដែលមានផ្ទះសំបែងខ្មែរច្រើននោះឱ្យគេចូលរួមរបៀបណា ?

**វ៉ាស្នា អួន :** បាទសំណួរនេះល្អណាស់ ឥឡូវនេះពុំទាន់មានដំណាក់កាលណាមយយនោះនៅឡើយទេ តែទោះយ៉ាងណាខ្ញុំជឿថា ពួកគាត់ពុំអាចអង្គុយចាំមើលបានទេ **តទៅទំព័រទី ២១**






អ៊ុំចននឹកប្តីគាត់ពេកខ្លាំងណាស់ដោយកាលប្តីនៅរស់កាត់ចេះតែមួរម៉ៅពុំមានសម្តីផ្អែមល្ហែមម្តងណាសោះទៅកាន់ប្តី ។ គាត់ដឹង ដែរថាប្តីគាត់ស្រលាញ់ ហើយថ្នមចិត្តគាត់មែន ហើយតែប្តីគាត់មិនឆ្លាតដូចគាត់ចង់បានទើបស្អី វាចេះតែបណ្តាលឱ្យចិត្តគាត់ក្តៅក្រហាយឃើញមុខគាត់ចង់តែរអ៊ូរទាំ ឥឡូវប្តីស្លាប់ទៅ នឹងឡើងចេះតែអាណិត គាត់ក៏សម្រេចចិត្តរកយាយឥន្ទជាន់រូបសួរសុខទុក្ខបងយ៉ៃតប្តីគាត់ ។ ពេលរូបយាយឥន្ទចូលស្រេចហើយឃើញអាការៈរញ្ជាក់រញ្ជួរស្ទើរចាប់មិនឈ្នះ ហើយបញ្ចេញវិចារថា : នែកាចនហេតុអីឯងមកដាស់ឱ្យអញភ្ញាក់ពេលថ្មើរនេះ មានការអីចង់សួរនាំឬ? អ៊ុំចន ក៏ពោរពេញដោយទឹកភ្នែកបន្លឺសំឡេងខ្សឹកខ្សួល : "ចាំ លោកយាយបង់បត់ខ្ញុំចង់ជួបបងយ៉ៃតប្តីខ្ញុំ ហើយសួរសុខ"ទុក្ខគាត់" ។ រូបបង់បត់ក៏ឆ្លើយថាៈ "អើចង់សួរអីទៅអាយ៉ៃតវាកំពុងតែនៅក្បែរអញនេះ " ។ អ៊ុំចន រលីងរលោងដោយទឹកភ្នែក : "បងយ៉ៃតប្តីសំឡាញ់អូន! បងឃើញអូនទេ អូននឹកបងណាស់" ។ សម្លេងយាយបង់បត់ប្រែមកជាសម្លេងមនុស្សប្រុសស្រដៀងសម្លេងពូយ៉ៃតកាលនៅរស់ប្រាកដមែន : "អើបងឃើញអូនហើយ ឥឡូវអូនមានអី១នឹងគេទេពេលបងមិននៅក្បែរ ?" អ៊ុំចនស្ទើរស្រែកយំៈ "ទេ! បងនៅតែមិនយល់ចិត្តអូនមកពីអញ្ចឹងហើយទើបអូននឹកបងមកសុំឱ្យយាយឥន្ទបង់បត់ជួយឱ្យបានជួបបង" ។ យាយយ៉ៃតក្នុងរូបយាយបង់បត់ក៏រំភើបចិត្តដែរ ទើបមានសំឡេងខ្សឹកខ្សួលអួលអាក់ : "បងក៏ នឹកអូនណាស់ដែរបើកាលនៅរស់អូនមានពាក្យផ្អែមល្ហែមយ៉ាងហ្នឹងបងមិនទាន់ស្លាប់ទេ ឥឡូវហួសអស់ហើយឯងអើយ!... ហ៊ូ១..." ។ អ៊ុំចន ខំទប់ទឹកភ្នែកនឹកប្រឹងនិយាយកុំឱ្យរអាក់រអួលៈ "កុំយំអីបងវាហួសអស់ហើយ អូននៅម្នាក់ឯង ខំធ្វើបុណ្យឧទ្ទិសជូនបងសុំឱ្យបងបានសុខ សូមបងបានអ្វី១ដែលបងប្រាថ្នា ឥឡូវបងបានប្រកបដោយយ៉ាងណាដែរ? ។ យាយយ៉ៃតឆ្លើយដោយសោះអង្អើយ : បងបានសុខហើយអូន បានសុខតាំងតែពីថ្ងៃមកដល់ទីនេះភ្លាមម្លេះអូនអើយ ! ប្រហែលពេលនោះអូនមិនទាន់បានធ្វើបុណ្យឧទ្ទិសកុសលឱ្យបងនៅឡើយទេ តែបងពិតជាសុខសប្បាយអីម្លេះទេអូនកុំបារម្ភអី!" ។ អ៊ុំចនគាត់មិនទាន់អស់ចិត្តក៏សួរបន្ថែមទៀត"ឥឡូវបងបានទៅដល់សោយសុខនៅឋានសួគ៌ហើយហ្នឹងឬអី? ។ នាយយ៉ៃតឆ្លើយដោយគ្មានលាក់លៀមអី : "ទេអូនបងកំពុងនៅឯឋាននរកទេ អូន! តែគ្មានអ្នកណាគេហ៊ានវាយជេរស្តីបន្ទោស ធ្វើបាបបងសោះទេ គេគោរពសិទ្ធមនុស្សជាងកាលបងនៅឋានកណ្តាលខ្លាំងណាស់!" ។ អ៊ុំចនក៏ចប់យោបល់តែប៉ុណ្ណោះទៅ ៕





លោក វាសនា ទួន

លោក វាស្នា ទួន បានពន្យល់ ខ្មែរផូស ស.រ.អា ដូចតទៅ :

**វាស្នា ទួន :** សេចក្តីសម្រេចរបស់សាលាក្រុងឱ្យបង្កើតក្រុងខ្មែរនេះឡើងបានធ្វើមួយឆ្នាំ ហើយមុខខ្ញុំមកកាន់តំណែងថ្មីនេះ

**ខ្មែរផូស :** តើកំណត់ព្រំដែនក្រុងខ្មែរនោះពីណាទៅណា ?

**វាស្នា ទួន :** គឺក្រុងនេះស្ថិតនៅលើកន្លែង "មីឌិលសិច ប្លូហ្សា" ខ្មែរយើងងហៅ "ប៉ៃលិន ប្លូហ្សា" កន្លែងដែលមានហាងលក់ដូរ ខ្មែរជាច្រើននៅថ្ងៃក្រោយយើងនឹងពង្រីកឱ្យទៅដល់ "វេសហ្វិត" ថែមទៀត កន្លែងដែលមានហាង និងភោជនីយដ្ឋានខ្មែរមួយចំនួន ។ នៅលើផ្លូវនោះ យើងនឹងតាំងរូបដែលមានលក្ខណៈខ្មែរ មានរូបបួន ដូចជា រូបស្រ្តីកន្ទៀតក្អមជាដើម គឺដាក់នៅលើសសរដងគោមកន្លែងដែលមានឈ្មោះផ្លូវថ្ងៃក្រោយយើងនឹងធ្វើថែមទៀត គឺរង់ចាំថវិកា ដើម្បីយកមកធ្វើខ្លោងទ្វារអ្វីជាដើម ។

**ខ្មែរផូស :** ចុះសម្រាប់ផ្លូវ "ឆេមហ្វឺត" ដែលសំបូរហាងខ្មែរដែលនោះនឹងរីកទៅនោះទេ ?

**វាស្នា ទួន :** មិនបានគិតដល់ហ្នឹងនៅឡើយទេ

**ខ្មែរផូសៈ** ធ្វើឱ្យបានទៅជាក្រុងខ្មែរ តើសង្ឃឹមថា អ្វីខ្លះនឹងផ្លាស់ប្តូរ ?

**វាស្នា ទួន :** បាទ នេះនឹងជួយដល់ខ្មែរយើង ! ទី១ គឺទេសចរនឹងចូលមកទស្សនាតំបន់ខ្មែរយើងនឹងចូលភោជនីយដ្ឋានខ្មែរ ឬទិញរបស់របរខ្មែរដែលនឹងធ្វើឱ្យម្ចាស់ហាងបានកើនក្នុងមុខរបរខ្លួន ទី២ គឺវប្បធម៌ជាតិខ្មែរនឹងបានរីកដោយសារភ្ញៀវគេមកទិញវត្ថុអនុស្សាវរីយ៍ ធ្វើឱ្យគេស្គាល់ដល់តម្លៃវប្បធម៌យើង

**ខ្មែរផូសៈ** ដើម្បីឱ្យគេដឹងស្គាល់ថា ខ្មែរយើងមានក្រុងខ្លួន នៅទីនោះតើលោកនឹងផ្សព្វផ្សាយរបៀបណា ?

**វាស្នា ទួន :** នៅលើវេបសាយសាលាក្រុងគេមានបង្ហាញពីតំបន់ក្រុងខ្មែរយើងនោះ ពីត្រឹមណាដល់ត្រឹមណា កន្លែងណាមកលក់អ្វី ? អ្នកដឹកនាំនៅក្នុងសង្គមយើងហ្នឹង ក៏ត្រូវជួយផ្សព្វផ្សាយថែមទៀត ។ ហើយទី៣ ហ្នឹងគណកម្មការក្រុងខ្មែរនោះគេមានវេបសាយរបស់គេ

**ខ្មែរផូស :** លោកថា មានគណៈកម្មការមួយរបស់ក្រុងខ្មែរ តើនរណាជាអ្នកដឹកនាំ ?

**វាស្នា ទួន :** ប្រធានគឺលោក សេងលី គង់ មានលោក រដ្ឋាខៃ លោក សំអាត អ៊ុម លោក



តុលាយុត្តិ **តទៅទំព័រទី ៨**




# រមណីយដ្ឋានធម្មជាតិនៅ ខេត្ត កំពង់ស្ពឺ

**ខេត្តកំពង់ស្ពឺ គឺជាខេត្តមួយដែលសម្បូរទៅដោយដើមត្នោតច្រើនជាងគេ ហើយក៏មានសម្បត្តិវប្បធម៌ និងរមណីយដ្ឋានធម្មជាតិយ៉ាងច្រើនដើម្បីទាក់ទាញភ្ញៀវទេសចរជាតិ និងអន្តរជាតិឱ្យមកលេងកម្សាន្តនៅខេត្តនេះជាច្រើនផងដែរ ។ ពីព្រោះខេត្តកំពង់ស្ពឺស្ថិតនៅជិតទីក្រុងភ្នំពេញភ្ញៀវទេសចរដែលធ្វើដំណើរទៅកម្សាន្តអាចវិលត្រឡប់បានដោយងាយស្រួលមិនចាំបាច់ចំណាយពេលយូរថ្ងៃឡើយ ។**





លោកប្រធានមន្ទីរវប្បធម៌ និងវិចិត្រសិល្បៈខេត្តបានឱ្យដឹងថា ទោះបីខេត្តកំពង់ស្ពឺពុំមានប្រាសាទបុរាណច្រើនដូចបណ្តាខេត្តផ្សេងទៀតក្តី ប៉ុន្តែខេត្តកំពង់ស្ពឺក៏មានវប្បធម៌ចំណាស់ៗ និងធនធានធម្មជាតិយ៉ាងច្រើនគួរជាទីគាប់ចិត្តភ្ញៀវទេសចរផងដែរ ។ តំបន់វប្បធម៌ និងរមណីយដ្ឋានធម្មជាតិទាំងអស់នោះមានដូចជា :

**•សារមន្ទីរនរៈបូរី :** បើយើងធ្វើដំណើរកាត់តាមដងផ្លូវជាតិលេខ៤ នៅត្រង់ចំណុចភូមិចំបក់ យើងនឹងឃើញ "សារមន្ទីរនរៈបូរី" ។ សារមន្ទីរនេះត្រូវបានសាងសង់ឡើងជាលក្ខណៈគ្រួសារ ដោយមានរក្សាទុកនូវបេតិកភណ្ឌសម្បត្តិវប្បធម៌ជាតិជាច្រើន ។ សារមន្ទីរនរៈបូរីមានវត្ថុបុរាណតាំងពីបុរេប្រវត្តិ រហូតមកដល់បច្ចុប្បន្ននេះ ហើយវត្ថុទាំងនោះភាគច្រើនជារូបបដិមាធ្វើពីឈើ ពីថ្ម និងកូលាភាជដែលសរុបទាំងអស់មានរាប់ពាន់វត្ថុបុរាណ ។

**•រមណីយដ្ឋានអំពែភ្នំ :** អំពែភ្នំជារមណីយដ្ឋានវប្បធម៌ និងធម្មជាតិមានទីតាំងស្ថិតនៅភូមិតាំងទន្លេ និងភូមិអំពែភ្នំឃុំសុពណ៌ទេព និងឃុំស្វាយក្រវ៉ាន់ ស្រុកច្បារមន មានចំងាយផ្លូវ៤៨គមពីភ្នំពេញ ។ តំបន់នេះមានទេសភាពនៃទឹកស្ទឹងឆ្លងកាត់រួមផ្សំដើមឈើតូចធំដុះប្រជ្រៀតគ្នាតាមដងស្ទឹងបង្កើតបានជាទេសភាពគួរឱ្យគយគន់ក្រៃលែង ។ នៅជើងភ្នំអំពែភ្នំមានស្ពានយោលមួយឆ្លងកាត់ពីត្រើយម្ខាងទៅត្រើយម្ខាងទៀតដើម្បីតភ្ជាប់ភូមិតាំងទន្លេរបស់ឃុំសុពណ៌ទេពទៅភូមិអំពែភ្នំ ។ នៅរដូវប្រាំងបើយើងឈរពីលើស្ពានយោលសម្លឹងចុះទៅក្នុងបាតស្ទឹងនោះ យើងនឹងឃើញទឹកស្ទឹងហូររ៉ែមៗ គេចផ្ទាំងថ្ម និងពំនូកខ្សាច់ដោយមានហ្វូងត្រីចង្វាតូចៗហែលប្រដេញគ្នាឆ្វាត់ឆ្វែង រីឯនៅរដូវវស្សាវិញបើយើងឈរនៅលើស្ពានយោលសម្លឹងចុះទៅក្រោមវិញនោះ យើងនឹងបានឃើញខ្សែទឹកហូរយ៉ាងខ្លួលខ្លាញ់បែកពពុះគួរឱ្យព្រឺខ្លាចក្រៃលែង ។ នៅត្រើយខាងត្បូងស្ទឹង យើងសង្កេតឃើញមានវត្តចាស់បុរាណមួយនៅលើកំពូល

**តទៅទំព័រទី ១៦**

# ខេត្តកំពតជាតំបន់ទេសចរណ៍ ដែលសម្បូរដោយសម្បត្តិធម្មជាតិ

ខេត្តកំពត គឺជាខេត្តមួយដែលស្ថិតនៅភាគនិរតីនៃប្រទេសកម្ពុជាមានចម្ងាយផ្លូវចេញពីភ្នំពេញ១៤៨គីឡូម៉ែត្រ តាមផ្លូវជាតិលេខ៣ និងមានផ្លែទុរេនជានិមិត្តរូបនៅរង្វង់មូលដែលកសាងឡើងកាលពីពេលថ្មីៗនេះនៅកណ្ដាលក្រុងកំពត ។ ខេត្តនេះសម្បូរ ដំណាំផ្លែ ឈើហូបផ្លែផ្សេងៗជាច្រើន ជាពិសេសផ្លែទុរេន ដែលមានរសជាតិឈ្ងុយឆ្ងាញ់ និងផ្អែមត្រជាក់អាចនិយាយថា ជាទុរេនដែលឈ្ងុយឆ្ងាញ់ជាងទុរេននាំចូលមកពីបរទេស ។



●ទេសភាពដ៏ស្រស់ត្រកាលនៃព្រៃឈើដងភ្នំទឹកជ្រោះធម្មជាតិ និងទឹកសមុទ្រដ៏ខៀវស្រងាត់ជាប្រភពភោគផលពីធម្មជាតិដែលផ្ដល់នូវអាហារសមុទ្រជាច្រើនប្រភេទដូចជា ក្ដាមសេះ ក្ដាមថ្ម បង្គា មឹក ខ្យង និងគ្រែងគ្រំ យ៉ាងសម្បូរបែបសម្រាប់ផ្គត់ផ្គង់ក្នុងខេត្ត និងនាំចេញ ព្រមទាំងជាទីតាំងផលិតអំបិលដ៏ធំមួយក្នុងប្រទេសកម្ពុជា និងទឹកត្រីដ៏មានរសជាតិឈ្ងុយឆ្ងាញ់ពិសាទៀតផង ។ ម្យ៉ាងទៀត កំពតគឺជាក្រុងមួយដ៏ល្បីល្បាញផង ដែរកាលពីសម័យអាណានិគមនិយមបារាំង ។ ខេត្តនេះ មានសំណង់ប្រវត្តិសាស្ត្រជាច្រើន ដូចជា ផ្ទះល្វែង ផ្សារលក់ទំនិញ (ផ្សារណាត់) មន្ទីរពេទ្យជាដើមសុទ្ធសឹកជាភស្តុតាងបង្ហាញឱ្យឃើញពីការចាប់អារម្មណ៍របស់ពួកបារាំងនៅលើទឹកដីខេត្តមួយនេះ ។ ជាពិសេសភោគផលធម្មជាតិទាំងនេះ គឺជាសក្ដានុពលដែលមានការទាក់ទាញភ្ញៀវទេសចរឱ្យចូលចិត្តមកកម្សាន្តសប្បាយនាពេលឈប់សម្រាកពីការងារនៅថ្ងៃចុងសប្ដាហ៍ ឬនៅថ្ងៃបុណ្យជាតិផ្សេងៗ ។



នៅខេត្តកំពតមានតំបន់ទេសចរណ៍ជាច្រើនកន្លែងមានដូចខាងក្រោមនេះ :

**+ឧទ្យានជាតិព្រះមុន្នីវង្ស ឬហៅ ថាភ្នំបូកគោ :** មានទំហំផ្ទៃដីប្រមាណ១៤០០០០ហិកតា មានចម្ងាយផ្លូវប្រមាណ៤២ គ.មចេញពីទីរួមខេត្តទៅដល់កំពូលភ្នំ ។ ឥឡូវនេះការធ្វើដំណើរឡើងលើកំពូលភ្នំ គឺមានស្ថានភាពផ្លូវងាយស្រួល ព្រោះក្រុមហ៊ុនចិនទើបតែស្ថាបនាផ្លូវហើយប្រមាណ៧០-៨០% ។ នៅលើកំពូលភ្នំមានកម្ពស់១០៧៥មដែលផ្ដល់ការចាប់អារម្មណ៍ដល់ភ្ញៀវទេសចរណ៍ទាំងឡាយ គឺមានទេសភាពដ៏ស្រស់ត្រកាលនៃដងព្រៃតាមផ្លូវឡើងភ្នំដោយបានទស្សនាកម្សាន្ត និងស្ដាប់សំឡេងទឹកជ្រោះធ្លាក់ពាជាន់លាយឡំគ្នាជាមួយនឹងមួយសំឡេងសត្វយំបង្កើតបានជាស្គូរតន្ត្រីធម្មជាតិយ៉ាងពីរោះយើងអាចគយគន់មើលនូវសំណង់ប្រវត្តិសាស្ត្រកាស៊ីណូកាលពីសម័យអាណានិគមនិយមបារាំង និងចូលអុជធូបថ្វាយផ្កាភ្ញីដល់ព្រះពុទ្ធបដិមាដើម្បីសុំសេចក្ដីសុខសប្បាយនៅវត្តសំពៅប្រាំដែលល្បីថា មានបារមីស័ក្តិសិទ្ធិ ហើយយើងអាចឈរស្រូបយកខ្យល់អាកាសដ៏បរិសុទ្ធដោយសម្លឹងមើលទេសភាពនៅជុំវិញខេត្តពីលើកំពូលភ្នំធ្វើឱ្យអារម្មណ៍របស់យើងស្រស់ថ្លា ជាពិសេសបានជួប

តទៅទំព័រទី ១៦





# គណបក្ស សម រង្ស៊ី សំដែងឫទ្ធិ



សាខាគណបក្ស សម រង្ស៊ី នៅឡូវែល



សម រង្ស៊ី បង្ហាញផ្សាយបន្តផ្ទាល់ពីឡូវែលទៅកម្ពុជា

**ដោយៈ ខ្មែរជុំស**

**ឡូវែលៈ** សមាជិកនិងភ្ញៀវរបស់គណបក្ស សម រង្ស៊ី ប្រមាណជា៤០០នាក់បានមកសម្តែងការគួរសមនារាត្រីថ្ងៃសៅរ៍ ៥មេសាដល់លោក សម រង្ស៊ី ដែលជាប្រធានគណបក្សនិងជាសមាជិកសភាខ្មែរនិរទេសខ្លួន ដើម្បីចៀសវាងការចាប់ខ្លួន បន្ទាប់ពីតុលាការខ្មែរដែលបានចោទប្រកាន់ពីការដកបង្គោលព្រំដែនខ្មែរ ឱ្យជាប់ពន្ធនាគារ ១២ឆ្នាំ ។ ចំនួនសមាជិកចូលរួមបដិសណ្ឋារកិច្ចដ៏ច្រើននៅឡូវែលនេះ បញ្ជាក់ពីមូលដ្ឋានជំហររបស់គណបក្សដ៏សំខាន់ជាងគេបង្អស់នៅសហរដ្ឋអាមេរិកនេះ ។

នៅក្នុងសុន្ទរកថាដ៏វែងថ្លែងទៅកាន់ភ្ញៀវទាំងអស់ពីនយោបាយនៅកម្ពុជាលោក សម រង្ស៊ី បានធ្វើឱ្យភ្ញៀវទាំងអស់ទះដៃខ្ទរខ្ទារជាច្រើនដង ចំពោះនយោបាយដែលរថា នយោបាយកម្ពុជាជារណបនៃបរទេស រដ្ឋាភិបាលបានធ្វើបាបប្រជារាស្ត្រខ្លួនឯងដោយយកដីពីរាស្ត្រក្រីក្រទៅលក់ឱ្យនាយទុន ប្រព្រឹត្តអំពើពុករលួយគ្រប់វិស័យ កាត់ដែនដីឱ្យទៅវៀតណាម ប្រកាន់អំណាចផ្តាច់ការ ក្តោបក្តាប់អំណាចលើគ្រប់ស្ថាប័នជាតិទាំងអស់ ។ លោក សម រង្ស៊ី ថ្លែងប្រកាសប្រាប់អ្នកចូលរួមស្តាប់ថាលោកមានផែនការបីឆ្នាំសម្រាប់រំលំយកអំណាចពីលោក ហ៊ុន សែន តាមរយៈលទ្ធផលនៃអំពើឧក្រិដ្ឋទាំងឡាយដែលលោក ហ៊ុន សែន បានធ្វើឬបញ្ជាឱ្យធ្វើក្នុងអំណាចខ្លួនជានាយករដ្ឋមន្ត្រីនៃប្រជាជាតិខ្មែរ ។ នាពេលនោះមានការផ្សាយបន្តផ្ទាល់ពីសុន្ទរកថា លោក សម រង្ស៊ី នៅឡូវែលបានភ្ជាប់អាំងទែណេតរូបភាពនិងសំឡេងទៅកាន់អង្គប្រជុំគណបក្ស សម រង្ស៊ី មួយនៅកម្ពុជាផង ដែលជាហេតុធ្វើឱ្យអវត្តមានរបស់លោក សម រង្ស៊ី ពីកម្ពុជា ពុំបានធ្វើឱ្យសមាជិកគណបក្ស សម រង្ស៊ី នៅឯកោពីប្រធានរបស់ពួកគេនោះទេ ។





សម មាស មកបង្ហាញខ្លួនជាបេក្ខជនតំណាងរាស្ត្រអាមេរិកាំង



រាត្រីសមោសរកំដរដោយភ្លេងនិងចំរៀងសម័យជាកិត្តិយសជូនចំពោះប្រធានគណបក្ស សម រង្ស៊ី បានប្រមូលរៃអង្គាសបានប្រាក់១ម៉ឺនដុល្លារ សម្រាប់ការឧបត្ថម្ភដល់ការិយាល័យកណ្តាលរបស់ពួកគេឯទីក្រុងភ្នំពេញ ។ **ខ្មែរប៉ុស្តិ៍**

# ASRIC

healing through justice.

To this end, ASRIC spearheaded outreach and community forums. Since 2009, ASRIC has organized, with community partners, forums in Long Beach, Santa Ana and San Jose, CA, Portland, Oregon, Lowell, MA, Philadelphia, PA, Washington DC, Baltimore, MD and Virginia. Some community collaborations include but are not limited to the following: Cambodian Association of Greater Philadelphia (CAGP), the Cambodian American Community of Oregon (CACO), the Cambodian Family, Cambodian Americans for Human Rights and Democracy (CAHRAD), the Khmer Post East-Coast, the Cambodian Mutual Assistance Association (CMAA), and the Metta Health Center. These forums raised awareness about the tribunal and collected 170 testimonies (41 civil parties and 129 complainants) from survivors.

ASRIC strongly believes it is critical that survivors' voices are heard. They endured some of the most horrific violations against their human rights under the Khmer Rouge draconian reign from 1975 to 1979. Many of these survivors who courageously submitted their testimonies to the ECCC are elderly who suffered tremendous losses under the Khmer Rouge regime. They have shown strength and fortitude in the midst of numerous health and psychological pressures to become a part of this historic trial to indict senior Khmer Rouge leaders in Case 002. Initially with the help of Professor David Kaye and his students at the UCLA Law School, International Justice Clinic, ASRIC successfully submitted these testimonies to the court. In November 2011, all 170 testimonies were accepted as part of the larger body of evidence for the proceedings of Case 002 in which four high ranking Khmer Rouge officials are to be indicted. After submission of the testimonies, ASRIC sought legal representation from the Center for Justice and Accountability (CJA) who will advocate for the participatory rights of the survivors in Case 002.

As part of the healing process and the quest for justice beyond Case 002, ASRIC recently launched a campaign to push for the prosecutions of other former senior perpetrators involving Cases 003 and 004. ASRIC – and its local partners in Cambodia – wants these prosecutions to continue so that survivors have access to justice even after Case 002 comes to a close. This call is issued independently of the ECCC.

ASRIC is therefore asking interested parties to sign the following petition. Anyone can sign the petition irrespective of his/her background as a Cambodian and genocide survivor. Please join us in our collective call for justice and help us to spread the word! The petition is available online at: http://www.ipetitions.com/petition/cambodiansurvivorsseekjustice/

To learn more about ASRIC's work, please visit our website: www.asricjustice.org. Any questions can be sent to apa.asric-khmer.justice@nyu.edu

តមកទំព័រទី ១១

## រមនីយដ្ឋានធម្មជាតិនៅខេត្តកំពង់ស្ពឺ

ភ្នំដែលជាទីសក្ការៈរបស់ប្រជាពលរដ្ឋយើងនាំគ្នាទៅធ្វើបុណ្យទានតាមប្រពៃណីជាតិ ។ នៅតំបន់អំពៃភ្នំនេះអ្នកទេសចរអាចទៅងូតទឹក ឬឆ្លងស្ពានយោល និងអង្គុយកម្សាន្តលេងតាមតូបលក់ម្ហូបអាហារនៅតាមមាត់ស្ទឹងដើម្បីលំហែអារម្មណ៍ ហើយនៅតាមតូបនីមួយៗភ្ញៀវទេសចរអាចកុម្ម៉ង់ទិញម្ហូបអាហារបានតាមចិត្តប្រាថ្នា ។

**•ឧទ្យានជាតិព្រះសុរាម្រិតកុសមៈ (គិរីរម្យ ឈើ) :** គិរីរម្យជារមណីយដ្ឋានធម្មជាតិតំបន់នេះមានលក្ខណៈពិសេសសម្រាប់ភ្ញៀវទេសចរដោយមានព្រៃដើមស្រល់យ៉ាងក្រាស់មានម្លប់ជាទីមនោរម្យ ព្រមទាំងមានខ្យល់អាកាសដ៏បរិសុទ្ធដែលធ្វើឱ្យអារម្មណ៍របស់យើងស្រស់ស្រាយ ។ ឧទ្យានជាតិនេះស្ថិតនៅក្នុងភូមិដីរផុង ឃុំគិរីរម្យស្រុកភ្នំស្រួចមានចម្ងាយផ្លូវ១១៧គ.ម ពីភ្នំពេញតាមផ្លូវជាតិលេខ៤ នៅលើកំពូលភ្នំមានកម្ពស់៧០០ម ។

**•រមណីយដ្ឋានគិរីរម្យ (ក្រោម) :** រមណីយដ្ឋាននេះស្ថិតនៅក្បែរជើងភ្នំគិរីរម្យទីនេះភាគច្រើនត្រូវបានគេកែច្នៃឱ្យមានភាពរស់រវើកល្អស្អាត ដើម្បីទាក់ទាញភ្ញៀវទេសចរ ។ ទីនោះមានសណ្ឋាគារកន្លែងក្មេងលេងសួននៃរូបចម្លាក់ដាយណូស័រទីលានកីឡា និងកន្លែងងូតទឹកជាដើម នៅទីនោះ ភ្ញៀវទេសចរនិយមទៅកម្សាន្តនៅថ្ងៃចុងសប្តាហ៍ ។

**•រមណីយដ្ឋានចំបក់ :** ចំបក់ជារមណីយដ្ឋានធម្មជាតិដ៏ស្រស់បំព្រង ហើយកំពុងពេញនិយមពីសំណាក់ភ្ញៀវទេសចរជាតិ និងអន្តរជាតិ ទីនោះមានទឹកធ្លាក់ដ៏ស្រស់ស្អាតមានជងអូរដ៏វែងអន្លាយ និងមានទឹកហូរបត់បែនកាត់ផ្ទាំងថ្មដោយមានម្លប់ឈើ និងម្លប់ដើមឫស្សីអមសងខាងផ្លូវធ្វើដំណើរធ្វើឱ្យយើងត្រជាក់ចិត្តគួរឱ្យចាប់អារម្មណ៍ក្រៃលែង ។ ចំបក់មានចម្ងាយផ្លូវជាង១គ.មខាងជើងគិរីរម្យស្ថិតនៅក្នុងឃុំចំបក់ស្រុកភ្នំស្រួច ។

**•ទឹកជ្រោះអន្លង់វ័ត្ត :** ទឹកជ្រោះអន្លង់វ័ត្តស្ថិតនៅចំងាយផ្លូវប្រមាណ៤គីឡូម៉ែត្រខាងជើងឧទ្យានជាតិគិរីរម្យ និងមានចំងាយប្រមាណ៣គីឡូម៉ែត្រពីរមណីយដ្ឋានទឹកធ្លាក់ចំបក់មានទីតាំងស្ថិតនៅក្នុងឃុំចំបក់ ស្រុកភ្នំស្រួច ។ រមណីយដ្ឋានទឹកជ្រោះអន្លង់វ័ត្តនេះត្រូវបានបង្កើតឡើងនៅចុងឆ្នាំ២០០៨ក្រោមការបង្ហាត់បង្រៀនរបស់អង្គការម្លប់បៃតង និងមន្ទីរទេសចរណ៍ខេត្តកំពង់ស្ពឺ ក្រោមការជួយឧបត្ថម្ភរបស់អង្គការវីស៊ីអិនរបស់ប្រទេសហូឡង់ ។

**•រមណីយដ្ឋានល្អាងភ្នំចាស់ :** រមណីយដ្ឋានល្អាងភ្នំចាស់ស្ថិតនៅក្នុងស្រុកឱរ៉ាល់ ។ ជារមណីយដ្ឋានប្រវត្តិសាស្ត្រដែលគេទើបនឹងរកឃើញថ្មីៗនេះ ។ នៅទីនោះសម្បូរទៅដោយល្អាងភ្នំធំៗ ហើយភ្ញៀវទេសចរដែលទៅកម្សាន្តនៅទីនោះនឹងបានទស្សនារបាំ និងទំនៀមទម្លាប់រស់នៅរបស់ជនជាតិភាគតិច គឺជនជាតិសួយ ។

**•រមណីយដ្ឋានវប្បធម៌ធម្មជាតិភ្នំព្រះ :** ភ្នំព្រះជាកន្លែងប្រមូលផ្តុំប្រជាពលរដ្ឋពីទីជិតឆ្ងាយឱ្យមកគោរពបូជាបន់ស្រន់ទៅតាមជំនឿរបស់ពួកគាត់ ។ ព្រោះទីនោះមានភាពអច្ឆរិយៈខ្លាំងណាស់ខាងជំនឿឱ្យតែដល់រដូវបន់ស្រន់ចូលមក



ដល់ពួកគាត់នាំគ្នាសម្រុកមកទីនេះរាប់ពាន់នាក់ដើម្បីធ្វើបុណ្យទានតាមជំនឿរបស់ពួកគាត់ ។ ទីនោះជាកន្លែងបួងសួងពូកែស័ក្តិសិទ្ធិណាស់នៅតាមជើងភ្នំព្រះមានសំណង់បែបសាសនាផ្សេងៗពីគ្នាយ៉ាងច្រើនបានសង់ព័ទ្ធនៅជុំវិញភ្នំព្រះ ។ ពិសេសនៅអំឡុងខែមីនា និងមេសាមានប្រជាជនរាប់ម៉ឺននាក់នាំគ្នាទៅធ្វើបុណ្យទាន និងគោរពសក្ការបូជាតាមជំនឿរបស់គាត់រៀងៗខ្លួន ។ ភ្នំព្រះមានរូងភ្នំ និងល្អាងភ្នំជាច្រើនមានលក្ខណៈធម្មជាតិពិតៗល្អាងភ្នំ និងរូងភ្នំខ្លះត្រូវបានគេរៀបចំជាកន្លែងគោរពសក្ការបូជា ។ រមណីយដ្ឋានវប្បធម៌ទេសចរណ៍ភ្នំចាស់មានផ្ទៃដី១០០ហិកតាស្ថិតនៅក្នុងស្រុកឱរ៉ាល់តាមផ្លូវទៅចំការអំពៅលីយ៉ុងផាត់មានចម្ងាយជាង៥០គ.មពីទីរួមខេត្តកំពង់ស្ពឺ ៕



តមកទំព័រទី ១២

## ខេត្តកំពតជាតំបន់ទេសចរណ៍...

នឹងអាកាសធាតុពពកចុះអ័ព្ទបែកផ្សែងហោះហើរវិលវល់លើផ្ទៃអាកាសផ្តល់នូវភាពចម្លែកចិត្ត និងត្រជាក់កាយយ៉ាងក្រៃលែងនៅរដូវវស្សា ឬចាប់ពីខែកក្កដាដល់វិច្ឆិកា ។

**•រមណីយដ្ឋានទឹកឈូ :** គឺជារមណីយដ្ឋានធម្មជាតិមួយនៅក្នុងខេត្តកំពតមានចម្ងាយផ្លូវពីទីរួមខេត្តប្រមាណ៨គ.ម ។ តំបន់ទេសចរណ៍នេះមានប្រភពទឹកធ្លាក់មកពីភ្នំដីរភ្នំកំចាយហូរកាត់តាមផ្ទាំងថ្មដានៃជ្រោះទឹកឈូមានកម្លាំងខ្សែទឹកហូរយ៉ាងខ្លាំងនៅរដូវវស្សាឆ្ពោះទៅដល់ចំណុចប្រសព្វគ្នារវាងព្រែកកំពត ឬរវាងទឹកសាប និងទឹកប្រៃជាប់គ្នា ។ ទឹកឈូដែលជាប្រភពទឹកយ៉ាងសំខាន់សម្រាប់ផ្គត់ផ្គង់ការប្រើប្រាស់របស់ប្រជាពលរដ្ឋនៅជុំវិញទីរួមខេត្តទាំងមូល ហើយភ្ញៀវទេសចរទាំងឡាយក៏អាចទស្សនាងូតទឹកលេង និងពិសាអាហារនៅលើផ្ទាំងថ្ម ឬតាមតូបជួលជាមួយនឹងការគយគន់មើលទេសភាពចម្ការដំណាំហូបផ្លែរបស់ប្រជាពលរដ្ឋដែលនៅអមសងខាងទឹកឈូធ្វើឱ្យអារម្មណ៍របស់យើងហាក់ដូចកំពុងស្ថិតនៅក្នុងទេសភាពធម្មជាតិយ៉ាងស្រស់បំព្រង ដោយភ្លេចអស់នូវការនឿយហត់ ហើយអ្វីដែលពិសេសនោះគឺចម្ការទុរេនដ៏ល្បីល្បាញដែលផ្តល់ផ្លែមានគុណភាពឈ្នះឆ្ងាញ់លេខមួយ ។ នៅមិនឆ្ងាយពីទីនោះប៉ុន្មាន ក៏មានសួនសត្វប្រជុំទៅដោយសត្វជាច្រើនប្រភេទ និងមានចម្ការដំណាំទុរេន មង្ឃុត ល្មុត និងខ្នុរយ៉ាងច្រើនធ្វើឱ្យអារម្មណ៍របស់អ្នកទស្សនាពុំចង់ឈានជើងចាកចេញពីតំបន់នោះឡើយ ។

**រមណីយដ្ឋានព្រែកអំពិល :** ព្រែកអំពិល ឬហៅថា ណាតាយ៉ា គឺជារមណីយដ្ឋាននៅតំបន់មាត់សមុទ្រមានចម្ងាយប្រមាណ១៨គ.មភាគខាងលិចខេត្តកំពតស្ថិតក្នុងភូមិព្រែកអំពិល ឃុំកោះតូច ស្រុកទឹកឈូ ។ ព្រែកអំពិលមានឆ្នេរខ្សាច់សក្បុសប្រកបដោយដើមកោងកាងដុះប្រេបតាមឆ្នេរដ៏ច្រើន និងមានដើមដូងរាប់រយដើមផ្តល់ម្លប់យ៉ាងត្រជាក់សម្រាប់ឱ្យភ្ញៀវទេសចរសម្រាកលំហែកាយយ៉ាងត្រជាក់ចិត្ត ។

ភ្ញៀវទេសចរអាចនាំយកចំណីអាហារ ឬ ភេសជ្ជៈពីផ្ទះទៅចម្អិន និងពិសានៅទីនោះយ៉ាងសប្បាយរីករាយ ។ ឥឡូវនេះតំបន់ព្រែកអំពិលត្រូវបានប្តូរឈ្មោះទៅជា "ណាតាយ៉ា" ដែលជារមណីយដ្ឋានកែច្នៃលាយជាមួយធម្មជាតិបង្កើតបានជាកន្លែងកម្សាន្ត បឹងហ្គាឡូ ភោជនីយដ្ឋាន និងជិះទូកកៃយ៉ាក់កម្សាន្តលេងលើអាងទឹកសមុទ្រយ៉ាងសប្បាយរីករាយ ។

ក្រៅពីតំបន់ទេសចរណ៍កម្សាន្តទាំងនេះ ក៏នៅមានកន្លែងស្រស់ត្រកាលគួរជាទីមនោរម្យផ្សេងៗទៀត ដូចជានៅទំនប់ប្រវត្តិសាស្ត្រទាក់ក្រឡាជាបឹងស្តុបទឹកខួបប្រាំងខួបវស្សាទឹកធ្លាក់វាលពូចដែលមានទេសភាពវាលខ្សាច់សក្បុសលាតសន្ធឹងយ៉ាងល្វឹងល្វើយជាប់នឹងទឹកធ្លាក់ចង្កេះភ្នំអន្លង់ត្នោត និងតំបន់ប្រវត្តិសាស្ត្រម្លេចដែលមានព្រំប្រទល់ខេត្តជាប់គ្នា គឺកំពត តាកែវ និងកំពង់ស្ពឺ ៕

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន



**ដោយ : ម៉ម យឹន**

មានលោកអតីតនាយទាហានជាន់ខ្ពស់កងទ័ពជាតិខ្មែរជាមេបញ្ជាការឈ្មោះលោក ព្រហ្ម វិត និងសហការីមួយចំនួនបានចូលរួមផង ។ ចលនានេះបានកើតឡើងតាំងតែពីក្រោយថ្ងៃទី១៧មេសា ១៩៧៥ គឺនៅពេលដែលប្រទេសជាតិត្រូវធ្លាក់ទៅនៅក្នុងអំណាចគ្រប់គ្រងរបស់កងទ័ពព្រៃនៃអង្គការបដិវត្តប្រជាជនខ្មែរយៀកមិញហៅខ្មែរក្រហមមកលោក ព្រហ្ម វិត នេះ បានដឹកនាំកងទ័ពរបស់លោកទាំងអស់នាំគ្នាដើរចេញទៅកាន់ព្រៃភ្នំលើខ្នងភ្នំបន្ទាត់ដែលជាព្រៃភ្នំយ៉ាងធំ ក្រៃលែង ហើយមានអាកាសធាតុខុសធម្មតាបណ្តាលឱ្យមានជម្ងឺគ្រុនចាញ់ខ្លាំងក្លាណាស់ដែលគេសន្និដ្ឋានខ្លាំងជាងប៉ៃលិនទៅទៀត ។

ក្នុងពេលធ្វើដំណើរទៅនេះ ក៏មានប្រជាពលរដ្ឋខ្មែររាប់ម៉ឺននាក់ទាំងប្រុសទាំងស្រីចាស់ក្មេងបានស្ម័គ្រចិត្តទៅជាមួយដែរ ។ ក្រោយពីបានទៅដល់ទីដៅ ហើយលោកមេបញ្ជាការចលនាសេរីភាពកន្សែងសនេះ ក៏បានបោះទីតាំងជាច្រើនកន្លែង និងរៀបចំជុំរុំប្រជាពលរដ្ឋជាច្រើននៅលើខ្នងភ្នំបន្ទាត់នេះ ដើម្បីរៀបចំផែនការវាយប្រយុទ្ធទៅលើកងទ័ពយួន និងខ្មែរក្រហមដែលជាក្រុមបន្តុបឡើងដោយកងទ័ពយួនក្រហមកុម្មុយនីស្ត ។

សកម្មភាពវាយប្រយុទ្ធរបស់ចកនានេះបានកើតឡើងជារបៀបកងទ័ពព្រៃជាក្រុមតូចៗចេញទៅវាយអុកឡុកទីតាំងកងទ័ពខ្មែរក្រហមស្រុកគាស់ក្រឡរជាច្រើនកកន្លែងបានត្រូវបំផ្លាញចោល ហើយទ័ពខ្មែរក្រហមមួយចំនួនបានស្លាប់ និងសុំចុះចូល ។

**-តើមានចលនាតស៊ូណាទៀត**

នៅមានជាច្រើនទៀត នៅតាមបណ្តោយព្រំដែនខ្មែរ-ថៃ ក្នុងស្រុកសេរីសោភ័ណស្រុកថ្មពួកស្រុកបន្ទាយឆ្មា ខេត្តបាត់ដំបង និងក្នុងព្រៃភ្នំ ជួរភ្នំ ដងរែក ដែលលាតសន្ធឹងរហូតដល់ខេត្តឧត្តរមានជ័យ ជាពិសេសក្នុងព្រៃភ្នំប្រាសាទព្រះវិហារ ក៏មានចលនាតស៊ូបានបោះទីតាំងយ៉ាងមាំៗដែរ ហើយមានកងទ័ព និងប្រជា-ពលរដ្ឋរាប់ម៉ឺននាក់ចូលរួមដែរ តាំងតែពីមុនឆ្នាំ១៩៧៩ម្ល៉េះ ដូចជាចលនារាជសីហ៍មានមេដឹកនាំឈ្មោះលោក អ៊ឹម ឈូដេត លោក សុភក្រ្ត វច្ឆនា លោក កែវ ជូន និងមនុស្សសំខាន់ៗមួយចំនួនទៀតរួម និងប្រជាពលរដ្ឋនិងកងទ័ពមួយចំនួនធំដែរ ។

-ចលនារក្សាសំបុកមានលោក កែវ វិបុល និងអស់លោកសំខាន់ៗមួយចំនួនរួម និងប្រជាពលរដ្ឋមួយចំនួនធំផងដែរ ។

-ចលនា កុកស មានលោក ព្រុំ សារូ ជា មេចលនា និងមានអស់លោក និងប្រជាពលរដ្ឋមួយចំនួនទៀត ។

នៅមានចលនាមួយចំនួនទៀត ដែលពុំអាចចាំឈ្មោះបាន ។

ដោយសារគោលដៅ និងគោលបំណងនៃចលនាទាំងអស់នេះ ដែលបានបង្កើតឡើងតាំងពីឆ្នាំ១៩៧៥. ៧៦.៧៧.នោះមក ដើម្បីវាយកម្ទេចក្រុមខ្មែរក្រហមដែលទៅចូលដៃជាមួយក្រុមយួនក្រហមកុម្មុយនីស្ត ហើយមកកាន់អំណាចនៅលើប្រទេសខ្មែរ ។ ទើបបណ្តាលឱ្យចលនាទាំងនោះបានសម្រេចចិត្តជាឯកឆន្ទៈថា ត្រូវតែរួបរួមសាមគ្គីគ្នាបង្កើតជារណសិរ្សដ៏ធំតែមួយទៅវិញ ដែលឱ្យឈ្មោះថា រណសិរ្សជាតិរំដោះប្រ-ជាពលរដ្ឋខ្មែរ រ.ជ.រ.ខ និង កងទ័ពជាតិរំដោះប្រជាពលរដ្ឋខ្មែរក.ជ.រ.ប.ខ ដែលមានបាវចនាថា សង្គ្រោះបំរើការពារប្រជាពលរដ្ឋខ្មែរ ។

បន្ទាប់មករណសិរ្សនេះ ដែលមានវរជនសំខាន់ៗជាច្រើនទាំងក្នុង និងក្រៅប្រទេស ដូចជានៅប្រទេសបារាំងប្រទេសសហរដ្ឋអាមេរិក ប្រទេសកាណាដាប្រទេសជប៉ុន ជាដើម បានសម្រេចលើកលោកតា សឺន សាន ដែលជាអតីតវរជនជាន់ខ្ពស់ជាអតីតសមាជិកសកម្មគណបក្សប្រជាធិបតេយ្យរបស់ព្រះអង្គម្ចាស់ស៊ីសុវត្ថិយុត្តិ វង្ស ទ្រង់ស៊ីសុវត្ថិ ឥន្ទ្រាវង្ស លោក អៀវ កើស លោក ប៉ាច ឈឺន លោក សឺន ង៉ុកថាន់ លោក ប៊ុន ចាន់ម៉ុល និងអស់លោកវរជនសំខាន់ៗធំៗដទៃទៀតជាច្រើនដែលបានបង្កើតគណបក្សប្រជាធិបតេយ្យ នា-អំឡុងឆ្នាំ១៩៤៩-៥០មកម្ល៉េះ មានន័យថា តាំងពីសម័យប្រទេសខ្មែរនៅក្រោមអំណាចត្រួតត្រានៃអាណានិគមនិយមបារាំង ។



ចំណែកកងទ័ពរំដោះប្រជាពលរដ្ឋខ្មែរ ចាប់តាំងពីដើមឆ្នាំ១៩៧៩ក៏បានរៀបចំឡើងយ៉ាងមានបររបៀបរៀបរយល្អប្រពៃដែរ បានតែងតាំងលោកឧត្តមសេនីយសក់ ស៊ុតសាខន ជាអគ្គមេបញ្ជាការលោកឧត្តមសេនីយដៀន ដែលជានាយកអគ្គសេនាធិការ និងមានអស់លោកអតីតថ្នាក់ឧត្តមសេនីយនិងនាយកទាហានជាន់ខ្ពស់ជាច្រើនទៀត ដូចជាលោក ថាច់ រ៉េង លោក ចក់ បូរី ជាដើមក្នុងនោះក៏មានរូបខ្ញុំបាទជាអតីតនាយកទាហានជាន់ខ្ពស់កងឯកភាពទាហានជាងម្នាក់ដែរ ។

ជាពិសេសទៅទៀត មានអស់លោកលោកជាមេបញ្ជាការចលនាសំខាន់ៗដែលបានចូលមករួបរួម

(មានតនៅលេខក្រោយ)

## នាទីប្រវត្តិសាស្ត្រ ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

ប្រែសម្រួលដោយ : គឹម វិមល

**២៣ តុលា :** ដើម្បីរំលឹកខួបលើកទី២នៃកិច្ចព្រមព្រៀងក្រុងប៉ារីស ឧត្តមសេនីយ៍ អន់ ឌឹសុន បញ្ជាឱ្យមានការដង្ហែរក្បួនព្យុហ៍យាត្រានៅភ្នំពេញ ដែលប្រជាពលរដ្ឋខ្មែរពុំមានសិទ្ធិមកទស្សនា ។ នៅតំបន់គ្រប់គ្រងដោយទ័ពបារាំងគេបានប្តូរសកម្មភាពទៅជាសកម្មភាពជួយពលរដ្ឋក្នុងតំបន់ទៅវិញ ។

**២៤តុលា :** លោក ផានិក សមាជិកសភាថៃ បានប្រឆាំងដាច់អហង្ការចំពោះការគ្របដណ្តប់ដាក់ចំពោះខ្មែរក្រហមដែលជីកត្បូង និងដឹកឈើចេញប្រើមនុស្សធ្វើការ១០ម៉ឺននាក់ក្រុមហ៊ុនប្រមាណ២០ ហើយថវិកាចូលខ្មែរក្រហម១០កោដិដុល្លារក្នុង១ឆ្នាំ ។

**២៩តុលា :** បរាជ័យការផ្តើមគំនិតជប៉ុន-ថៃ ខ្មែរក្រហមទាត់ចោលសំណើរដែលទើបស្នើរឱ្យខ្លួន ។

**២វិច្ឆិកា ១៩៩២ :** សម្តេចសីហនុចេញពីភ្នំពេញទៅព្យុងយ៉ាង រួចទៅប៉េកាំង

**៧-៨ វិច្ឆិកា :** ប្រជុំ CNS នៅប៉េកាំងចូលរួមដោយសហប្រធានប្រជុំក្រុងបារីស ហើយនឹងអាកាស៊ីផង -ខ្មែរក្រហមបញ្ជាក់ជំហរសាជាថ្មី

**៩វិច្ឆិកា :** ផ្តើមផ្សាយវិទ្យុអ៊ុនតាក់ជាវិទ្យុផ្សាយសម្លេងទី១ របស់ អ.ស.ប គេផ្សាយកម្មវិធីកន្លះម៉ោងបីដងក្នុងមួយថ្ងៃ

**១០វិច្ឆិកា :** ប្រទេសថៃប្រឆាំងនឹងការធ្វើឱ្យគាំងដំណើរពាណិជ្ជកម្មខ្មែរក្រហមនៅតំបន់ខ្មែរក្រហមកាន់កាប់ ថៃមិនឱ្យកម្លាំងអ៊ុនតាក់ចូលលើដីថៃ ហើយក៏គ្មានគាបសង្កត់ក្រុមហ៊ុនថៃណាមួយទេ ។

**១៥វិច្ឆិកា :** អាកាស៊ីទទួលស្គាល់ថា ការដកអាវុធពុំអាចធ្វើបានមុនពេលបោះឆ្នោតតាមដូចកិច្ចព្រមព្រៀងទេ "ការបង្កើន និងរក្សាបរិយាកាសនយោបាយអព្យាក្រិត គឺជាលក្ខណៈជៀសមិនបានដើម្បីឱ្យអាចបោះឆ្នោតដោយសេរី និងត្រឹមត្រូវបាន" ។ លោកបានឱ្យដឹងថា បរិយាកាសមិនអាចអព្យាក្រិតទៀតបានទេ -សមាជិកគណបក្សរងការគំរាមកំហែងគ្រប់យ៉ាង -ការចុះឈ្មោះចូលគណបក្សគ្មានសេរីភាព និងគួរគោរពទេ ហើយគណបក្សក៏មិនអាចធ្វើការងារគណបក្សដោយសេរីបានដែរ ។

**២៩ វិច្ឆិកា ១៩៩២ :** បញ្ជូនជនខ្មែរភៀសខ្លួន២០ម៉ឺននាក់មកមាតុភូមិ

**៣០វិច្ឆិកា :** ខ្មែរក្រហមប្រកាសបង្កើត PVNC នៅទីក្រុងញូយ៉កក្រុមប្រឹក្សាសន្តិសុខបានថ្កោលទោសឥរិយាបទខ្មែរក្រហម ហើយសម្រេចកាត់ផ្តាច់ការបញ្ជូនប្រេងសាំងទៅតំបន់នោះហាមមិនឱ្យបញ្ចេញឈើលក់ (សម្រេចពីមុនហើយ) ហាមមិនឱ្យយកត្បូងចេញ -ថ្ងៃ ៣១ មករា គឺជាកាលកំណត់ចុងក្រោយសម្រាប់ចុះឈ្មោះគណបក្សនយោបាយ -ការពន្យាពេលសារជាថ្មីឱ្យខ្មែរក្រហមដែលជាការបន្តនយោបាយ បើកចំហរឱ្យខ្មែរក្រហមដែលរហូតមកដល់ពេលនេះពុំបានទទួលលទ្ធផលល្អទេ ។

**១ធ្នូ ១៩៩២ :** រដ្ឋាភិបាលថៃបានហាមមិនឱ្យយន្តហោះ អ.ស.ប ហោះកាត់ តែក្រោមការតាមរបស់យោធាថ្ងៃ ៩ធ្នូ រដ្ឋាភិបាលថៃបើកឡើងវិញ ។

**២ធ្នូ :** យោធាអ៊ុនតាក់៦នាក់ត្រូវបានខ្មែរក្រហមចាប់ខ្លួនតែស្អែកឡើងលែងមកវិញ

**១៤ធ្នូ :** បិទជំរុំសាយប៊ី (B) ជំរុំសីហនុ និយម -ពីប៉េកាំងសីហនុគំរាមថា នឹងឈប់សហការណ៍ជួយអ៊ុនតាក់ដែលគ្មានសមត្ថភាព និងបង្កើតលទ្ធិប្រជាធិបតេយ្យ និងសន្តិភាព

**១៥ធ្នូ :** យោធាមូកខៀវ២១នាក់ត្រូវខ្មែរក្រហមចាប់ខ្លួន ហើយលែងមកវិញពេលព្រលឹម ។ បន្ទាប់មកចាប់ខ្លួន៤៦នាក់ទៀត ហើយលែងមកវិញពេលរសៀល -អ៊ុនតាក់ជូនឈ្មោះចំពោះមុខប្រជាពលរដ្ឋខ្មែរកាន់តែខ្លាំងឡើង

**១៩ធ្នូ:** បន្ទាប់ពីដោះលែងឈ្លើយសឹកទាំង៤៦នាក់ នាពេលប៉ុន្មានម៉ោងក្រោយមកក៏ចាប់ខ្លួន១១នាក់ផ្សេងទៀត ហើយគំរាមថា នឹងសម្លាប់ចោល -សម្តេចសីហនុបានធ្វើអន្តរាគមន៍ផ្ទាល់ព្រះអង្គ ហើយក៏មានការដោះលែងព្រឹកបន្ទាប់

**២២ធ្នូ:** ក្រុមប្រឹក្សាសន្តិសុខ អ.ស.បថ្កោលទោសការចាប់ខ្លួនកងកម្លាំងអ៊ុនតាក់ដោយក្រុមខ្មែរក្រហម -ថ្ងៃដដែលនោះការប្រយុទ្ធបានផ្ទុះខ្លាំងនៅតំបន់ខាងជើងឈៀងខាងលិច

**២៦ធ្នូ :** អង្គការសិទ្ធិមនុស្សរបស់អ៊ុនតាក់បានប្រកាសថា "បរិស្ថានអព្យាក្រិត្យមិនអាចធ្វើទៅបាន បើគេមិនគោរពសិទ្ធិមនុស្សនោះទេ" នេះបន្ទាប់ពីបាន ពិនិត្យឃើញថា មានអំពើហឹង្សានយោបាយ ដូចជាការវាយប្រហារលើការិយាល័យនយោបាយចំនួន៣០ដងក្នុងរយៈពេល១ខែធ្នូ -ដោយគណបក្សប្រជាជន

**២៧ធ្នូ :** ខ្មែរក្រហមវាយភូមិថាច់ (កំពង់ត្រឡាចខេត្តកំពង់ឆ្នាំង) សម្លាប់និគមន៍យួន១៤នាក់ ខ្មែរ២នាក់ ហើយមានរបួស១៦នាក់

**៣១ធ្នូ :** ផ្តើមហាមឃាត់ការដឹកឈើហ៊ុបចេញ-ក្រុមហ៊ុនថៃចំនួន៧ដែលពាក់ព័ន្ធបានប្រកាសថា សេចក្តីសម្រេចនេះ ធ្វើឱ្យថៃខាត $110លាន

**មានតនៅលេខក្រោយ**



## នាទីព្រះពុទ្ធសាសនា ពុទ្ធប្បវត្តិអមដោយរូបភាព

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឺត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.

**១៩៤**-ព្រះបរមសាស្ត្រាចារ្យទ្រង់បានបង្រៀនប្រដៅនិងប្រោសមនុស្សសត្វអស់៤៥ព្រះវស្សា. ព្រះអង្គទ្រង់តែងតែបំពេញពុទ្ធកិច្ចយ៉ាងលំបាក. មិនដែលខ្ជិលខ្ជាក្នុងកិច្ចការផ្សព្វផ្សាយព្រះធម៌របស់ព្រះអង្គឡើយ ។ ដោយសារតែចំណេះវិជ្ជាយល់ដឹងដ៏មហាធំធេង និងព្រះបញ្ញាដ៏ខ្ពង់ខ្ពស់ និងជ្រាលជ្រៅបំផុត ព្រះអង្គទ្រង់មិនត្រឹមតែសម្តែងធម៌ប៉ុណ្ណោះទេ ថែមទាំងដោះស្រាយបញ្ហាផ្សេងៗរបស់ប្រជាជនទាំងឡាយដែលព្រះ-អង្គទ្រង់បានជួប ហើយណែនាំទូន្មានឱ្យគេបានរំឭកយល់ដឹងអំពីបញ្ហាពិតៗនៃជីវិត ។ ព្រះមហាករុណាទ្រង់តែងបង្ហាញឱ្យឃើញពីទឹកព្រះទ័យរបស់ព្រះអង្គ ដើម្បីជួយដល់សព្វមនុស្សសត្វនៅពេលដែលគេមករកព្រះអង្គដោយមានបញ្ហា ឬចម្ងល់អ្វីមួយកើតឡើង ទោះបីជននោះ ជាកសិករជាអ្នកថែសួនជាជាងដែក ឬជាជាងរទេះក៏ដោយ ។



194-The Buddha had been teaching and converting people for forty-five years. yet he always worked very hard, never slackening, in his dharma-propagating work. When he was not journeying on the road, he spent his time not only expounding the dharma but also. because of his vast knowledge and lofty deep wisdom, solving problems for those people whom he encountered and direeting them to their realization of the true meaning of life. He always showed his willingness to help when someone approached him with a problem or question, whecher he was a farmer, a gardener, a black smith or a carmaker.

**១៩៥**- ព្រះសាស្ត្រាទ្រង់ពុំដែលមានព្រះទ័យស្ទាក់ស្ទើរក្នុងការឆ្លើយបំភ្លឺនូវរាល់សំនួរលំបាកៗ ឬក៏ពន្យល់អំពីបញ្ហាដែលមានភាពស្មុគស្មាញទេ ទាំងមិនដែលធុញទ្រាន់ជាមួយជនដែលទៅរកព្រះអង្គ ឬមិនដែលទាល់ឆ្លើយនឹងសំនួរដល់ម្តងណាឡើយ ។ ព្រះអង្គទ្រង់តែងសម្តែងធម៌តាមវិធីដ៏សមរម្យបំផុតដល់និស្ស័យមនុស្សសត្វទាំងពួង ទោះបីជននោះមករៀនធម៌ដោយគោរពស្មោះស្ម័គ្រ ឬទោះបីមកគ្រាន់តែផ្ចាញ់ផ្ចាលរំខានព្រះអង្គក៏ដោយ ។ ជនទាំងឡាយណាដែលមកសួរចង់យល់ដឹងអំពីបញ្ហាធម៌ដែលមានសេចក្តីជ្រាលជ្រៅក៏ត្រូវបានទទួលដោយរាក់ទាក់ និងធ្វើអធិប្បាយពន្យល់ដ៏ល្អឥតខ្ចោះ ។ ចំណែកពួកជនទាំងឡាយដែលមកដើម្បីប្រកួតប្រជែង ឬគ្រាន់តែដើម្បីសាកល្បងនឹងព្រះអង្គ ក៏ត្រូវទទួលបរាជ័យដោយសារតែព្រះបញ្ញារបស់ព្រះអង្គ ហើយដល់ទីបំផុតគេក៏បង្ហាញឱ្យឃើញពីឆន្ទៈរបស់គេសុំធ្វើជាសាវ័កដ៏ស្មោះស្ម័គ្ររបស់ព្រះអង្គអស់មួយជីវិត ។



195- The Buddha was never reluctant to answer difficult question or explain complicated problem nor had he ever been irked by any inquier or unable to answer or question. The buddha always expounded the dharma in a way most suitable to the nature of the people, whether they came to learn out of sincerrity or whether they were there only to heckly. Those who came to inquire about the more profound aspects of dharma were cordially welcomed and offered perfect and complete explanations. And those who came to challenge or test the Buddha were always defeated by his wisdom, and would finally express their desire to be the Buddha's loyal disciples for the rest of their lives.

**១៩៦**-ក្នុងវស្សាទី៤៥នៃព្រះពុទ្ធដំណើរប្រោសសត្វព្រះអង្គទ្រង់មានព្រះជន្មយាងចូល៨០ព្រះវស្សា ។ ព្រះដ៏ទ្រង់ញាណទ្រង់ជ្រាបថា ការធ្វើដំណើរប្រោសសត្វរបស់ព្រះអង្គដល់ទីបញ្ចប់ហើយដោយព្រះអង្គទ្រង់ដឹងច្បាស់ថា កំលាំងកាយរបស់ព្រះអង្គមានការខ្សោយចុះ ទោះបីជាកំលាំងទឹកព្រះទ័យរបស់ព្រះអង្គនៅខ្លាំងក្លាដូចមុនក៏ដោយ ។ ដោយទ្រង់ជ្រាបថា ព្រះអង្គមិនអាចមានព្រះជន្មគង់នៅក្នុងលោកនេះបានយូរអង្វែងទៀត ព្រះអង្គទ្រង់សម្រេចព្រះទ័យយាងទៅទិសខាងជើងសំដៅទៅជើងភ្នំហិមពាន្តជាកន្លែងដែលមានមនុស្សជាទីស្និតស្នាលបំផុតចំពោះព្រះអង្គកាលពីទ្រង់នៅជន្មាយុវ័យក្មេង ។ ព្រះពុទ្ធជាម្ចាស់ទ្រង់មានព្រះបំណងយាងចូលកាន់បរមនិព្វានក្នុងកន្លែងនោះ ដូច្នេះក៏ព្រះអង្គទ្រង់និមន្តចេញពីក្រុងរាជគ្រឹះជាមួយព្រះអានន្ទ និងព្រះភិក្ខុសង្ឃទាំងពួង ។



196-In the forty-five years of his travelling and preaching career, the Buddha had reached his eightieth year. He realized that his travelling around was about to end. for he left his physical strength was declining even though his mind was as strongas ever Knowing that he could not remain in the word muchlonger, the Buddha decided to journey north to the foothill of Himalayas, the region most familiar to him in his youger days. His intention was to enter Nirvana in that place. so he left the Rajarha with Ananda and a group of bhikhus.

**១៩៧**-តាមផ្លូវទៅទិសខាងជើងនោះ ព្រះពុទ្ធព្រះអង្គទ្រង់យាងកាត់ព្រះរាជាណាចក្រ **បាតលី** បន្ទាប់មកសំដៅត្រង់ទៅទិសខាងជើងកាត់តាមក្រុង **វេសាលី** ។ កាលពីមុនព្រះបរមគ្រូទ្រង់ធ្លាប់បានគង់នៅក្នុងក្រុង **វេសាលី** នេះជាកន្លែងដែលព្រះអង្គទ្រង់បានទទួលដីសួន **អម្ពវ័ន** ពីនាង **អម្ពបាលី** ដែលបានដណ្តើមប្រជែងគ្នាជាមួយនឹងអ្នកអង្គម្ចាស់ក្នុងនគរនេះ ក្នុងការថ្វាយទានដល់ព្រះពុទ្ធ ។ នៅពេលដែលព្រះសាស្តាយាងចូលដល់ព្រៃវេឡុវ័យហើយ ព្រះអង្គទ្រង់ត្រាស់ឱ្យភិក្ខុទាំងឡាយធ្វើកន្លែងស្នាក់នៅចាំវស្សាត្រង់ទីណាមួយដែលភិក្ខុពេញចិត្ត ក៏ប៉ុន្តែព្រះពុទ្ធជាម្ចាស់ និងព្រះអានន្ទសម្រេចព្រះទ័យគង់ចាំវស្សាក្នុងភូមិនោះ ។

(នៅមានតលេខក្រោយ)



197-On the way north, the Buddha went through the kingdom of Patali and then turned northward passing Vaisali. The Buddha had stayed in Vaisali before, where he received the offering of Amravana Garden from the dissolute girl Amrapali, who had completed with the princess of the country in making offerings to the buddha. When the Buddha arrived at the Bamboo Grove Village, he oerdered his bhikkus to take up residence for the rainy season anywhere they liked, but the Buddha and Ananda decided to remain for the rainy season there in the village.

(Continued to after Issue)




●សំរាប់ស្ត្រី Office ភាគច្រើន នាងចំណាយពេលវេលាពេញមួយថ្ងៃ អង្គុយនៅ និងកៅអី ហើយដាក់ម្រាមដៃនៅលើឃីបូតដែលសុភាពស្ត្រីនាងដឹងទេថា ការអង្គុយយូរៗបែបនេះ ហើយមិនបានផ្លាស់ប្តូរឥរិយាបថទាល់តែសោះអាចជាមូលហេតុចំបងក្នុងការបង្កអាការវៀចសរសៃឈាម ។ ព្រោះការអង្គុយរយៈពេលយូរនេះវាធ្វើឱ្យឈាមដែលហូរចុះមកចិញ្ចឹមត្រង់ជើងមិនអាចហូរត្រឡប់ឡើងទៅកាន់បេះដូងបានដោយងាយស្រួល ។ អាការៈបែបនេះ និងបង្កឱ្យសរសៃឈាមឡើងប៉ោង ឬវៀចរហូតអាចទៅរុញច្រានកោសិកា ឬអវយវៈដទៃដែលស្ថិតនៅក្បែរគ្នាធ្វើឱ្យអ្នកមានអារម្មណ៍ស្ពឹកស្រពន់ជើង និងហើមជើង ។ ប្រសិនបើចៀសវាងមិនបានហើយគួរធ្វើ ដូម្តេចនោះ យើងមានវិធីខ្លះយកមកណែនាំដូចខាងក្រោមនេះ :

# ថែរក្សាជើងឱ្យស្អាត

## សម្រាប់ស្ត្រីធ្វើការក្នុងការិយាល័យ



# ទទួលបានអាហារបែបណា ទើបធ្មេញស្អាត

●●●អ្នកដែលធ្លាប់ជួបប្រទះ និងរោគឈឺធ្មេញ ប្រហែលជាយល់ពីស្ថានភាពទុក្ខវេទនារបស់វាបែបណាហើយ ។ រាងកាយរបស់មនុស្សយើងត្រូវការទទួលទានអាហារដើម្បីឱ្យបានសារជាតិអាហារដែលមានប្រយោជន៍ដល់រាងកាយ ។ ក៏ប៉ុន្តែអាហារប្រភេទខ្លះបង្កឱ្យកើតទោសដល់រាងកាយរបស់យើងបានដូចគ្នា ជាពិសេសជាមួយ និងធ្មេញរបស់យើងតែម្តង ។

នៅពេលនេះយើងសាកល្បងមកពិនិត្យមើលទាំងអស់គ្នាថា អាហារអ្វីខ្លះដែលបង្កផលប៉ះពាល់ដល់សុខភាពធ្មេញរបស់យើងនោះ ។ នៅពេលយើងទទួលទានអាហារចូលទៅបាក់តេរីនៅក្នុងប្រអប់មាត់ និងបំលែងអាហារទាំងអស់នោះឱ្យក្លាយទៅជាអាស៊ីដបំផ្លាញធ្មេញរបស់យើង ។ ប្រសិនបើមិនដុះធ្មេញក្រោយទទួលទានអាហារទេនោះបាក់តេរីទាំងអស់នោះ និងអាចបង្កើតជាតិអាស៊ីដបំផ្លាញធ្មេញរបស់យើងទៅរឿយៗកាន់តែទទួលទានអាហារញឹកញាប់ក៏កាន់តែធ្វើឱ្យធ្មេញត្រូវបំផ្លាញកាន់តែខ្លាំងឡើងទៅតាមនោះដែរ ។

អ្នកគួរទទួលទានអាហារឱ្យបានគ្រប់៥ក្រុមទាំងបាយ នំប៉័ង បន្លែ ផ្លែឈើ ត្រី សណ្តែក ទឹកដោះគោ ប័រ ទឹកដោះគោជូរ ។ ប្រសិនបើទទួលទានអាហារកំដរមាត់គួរទទួលទានបន្លែផ្លែឈើជំនួសវិញ ហើយដុសធ្មេញក្នុងមួយថ្ងៃ២ដងព្រមទាំងប្រើឈើចាក់ធ្មេញ និងគួរទៅជួបជាមួយ និងទន្តពេទ្យរៀងរាល់៦ខែម្តង ។ អ្នកគួរកាត់បន្ថយការបៀមស្ករគ្រាប់ នំផ្អែម នំ ស្រួយ ទឹកក្រូច ហើយក៏មិនគួរជក់បារីផងដែរ ។

យើងដឹងហើយថា អាហារអ្វីខ្លះដែលបង្កផលអាក្រក់ដល់សុខភាពធ្មេញរបស់យើងមិនមែនយល់ឃើញថា ទទួលទានមិនបានទាល់តែសោះនោះទេ ក៏ប៉ុន្តែគួរប្រុងប្រយ័ត្នឱ្យបានកាន់តែខ្លាំង និងគួរងាកមកទទួលទានបន្លែផ្លែឈើជំនួសវិញទើបប្រសើរ ដើម្បីជួយឱ្យអ្នកមានស្នាមញញឹមយ៉ាងស្រស់ជាប់ជានិច្ចបាន ៕



# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំថោះ



ជោគជតាប្រចាំសប្តាហ៍



**ឆ្នាំជូត : (ពង្សទេព្តាប្រុសធាតុទឹក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះប្រកែកកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់និងកំហាល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាត្រូវចេះយល់ចិត្តគ្នា ទើបមានសេចក្តីសុខនៅក្នុងគ្រួសារ ៕



**ឆ្នាំថោះ : ( ពង្សមនុស្សស្រីធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននិងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕



**ឆ្នាំមមី : (ពង្សទេព្តាស្រីធាតុភ្លើង)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អ គ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយចូរកុំមានការ ធ្វេសប្រហែសឱ្យសោះជាពិសេសចំពោះអ្នកជំនួញជួញ ដូរមុននិងប្រគល់ ឬទទួលមុខទំនិញសព្វសារពើចូរចេះ ពិនិត្យមើលគុណភាពឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕



**ឆ្នាំរកា : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីអាចរើប១បន្តិច ឡើងវិញក្តីតែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនិងមានមនុស្សសម្តីផ្អែមត្រជាក់មកលួងលោមបំងបោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរស ស្ត្រី គឺមិនត្រូវឆាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះប្រកបតែសេចក្តីសុខនឹងគ្នា ៕



**ឆ្នាំឆ្លូវ : ( ពង្សមនុស្សប្រុសធាតុដី )**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ រាល់ឧបសគ្គ និងរាល់បញ្ហាស្មុគស្មាញត្រូវបានសាបរលាបបាត់ស្រមោលអស់រលីង ។ ដូច្នេះ លោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិចព្រោះការងារជាមាសប្រាក់ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះប្រកបតែភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕



**ឆ្នាំរោង : (ពង្សទេព្តាប្រុសធាតុមាស)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួប និងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឱ្យសោះជាពិសេសបើមានមនុស្សចម្លែក យករបស់របរមានតម្លៃមកបញ្ចាំ ឬលក់ឱ្យដោយធូរថ្លៃក៏មិនត្រូវទទួល ឬទិញយកដែរ ប្រយ័ត្នបានជាន់ដានចោរ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះមិនសូវចុះសម្រុងគ្នាប៉ុន្មានទេ ៕



**ឆ្នាំមមែ : (ពង្សទេព្តាស្រី ធាតុមាស)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះរាល់កិច្ចការងារដែលកំពុងតែប្រកប ដោយរលូននោះ ស្រាប់តែឈប់ទ្រឹងមួយកន្លែងលែងបោះជំហានទៅមុខ ព្រោះបានជួបនឹងគូប្រជែងជើងខ្លាំងចេញមុខមកតតាំង ។ ដូច្នេះត្រូវចេះរៀបចំជើងព្រួលទប់ទល់ជាមុន ទើបមិនលិចលង់ទាន់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះជួបរឿងរកាំរកូសច្រើន ៕



**ឆ្នាំច : (ពង្សយក្សស្រីធាតុដី )**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងបញ្ហាលំបាក១ច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយតែងបានជួបនិងគូប្រជែងជើងខ្លាំងចេញមុខមកតតាំងធ្វើជាឧបករណ៍រាំងស្កាត់មិនឱ្យបោះជំហានទៅមុខបានស្រួលឡើយ ដូច្នេះចូររៀបជើងព្រួលទុកសម្រាប់ទប់ទល់ជាមុនទើបមិនលិចលង់ទាន់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មានរឿងរកាំរកូសច្រើន ៕



**ឆ្នាំខាល : ( ពង្សយក្សស្រីធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់ កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះមុជមិនជ្រៅទៅមិនឆ្ងាយ តែបើលោកអ្នករកស៊ីនាយអាយនៅក្បែរ១ គឺអាចរកផលចំណូលហូរចូលច្រើនគ្រាន់បើ ព្រោះការជួញដូរ ផ្លូវឆ្ងាយបើមិនបានជួបគ្រោះអាក្រក់១ទេ ក៏និងបានបាតដៃទទេ ឬនាំរឿងក្តៅក្រហាយត្រឡប់ចូលផ្ទះវិញដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវយល់ចិត្តថ្លើមគ្នាទេ ៕



**ឆ្នាំម្សាញ់ : (ពង្សមនុស្សប្រុសធាតុភ្លើង)**

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់ កបល្អណាស់ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ ដោយក៏អាចដំណើរការបានស្រួលដែរ ជាពិសេសបើមានទាក់ទងផ្នែកជំនួញ គឺនិងទទួលបាននូវផលសម្រេចដូចបំណងប្រាថ្នា ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រលាញ់កុំទៅញឹកបើរ ព្នកកុំទៅញយ ទើបចំណងស្នេហ៍អាចគង់វង្សបានយូរអង្វែង ៕



**ឆ្នាំវក : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះឱកាសល្អបានមកដល់ហើយ ដូច្នេះលោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិច តែចូរកុំមានចិត្តលោភលន់ ព្រោះការលោភលន់នាំមកនូវក្តីវិនាសអន្តរាយ ។ ចំពោះគូស្នេហ៍ មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕



**ឆ្នាំកុរ : (ពង្សមនុស្សស្រីធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចប្រកប កិច្ចការងារបានពេញដៃពេញជើង តែនៅពេលជាប់មមាញឹកខ្លាំងចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់នាំឱ្យខាតបង់លាភសក្ការៈ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះប្រកបតែ សេចក្តីសុខក្សេមក្សាន្ត ៕

# លិខិតប្រកាសរកបងប្អូន



ខ្ញុំបាទឈ្មោះ ឈួន គីមសុង រស់នៅក្នុងរដ្ឋ California ។ ខ្ញុំបាទសូមសួរដំណឹងអំពីឈ្មោះ ធឿន ប្រាង (THOEUNG PRANG) ឈ្មោះ ដើម ឡូវ ឡេង (LOV LENG) ដែលធ្លាប់រស់នៅអាស័យ ដ្ឋាន 4933 OLD YORD RD. PHILADELPHIA, PA 19141 ប្រហែលពី១០ឆ្នាំមុន ។

ឈ្មោះ ធឿន ប្រាង ហៅ ឡូវ ឡេង នេះមានបងប្រុសម្នាក់រស់នៅភ្នំពេញសព្វថ្ងៃ ជា ញូង ហៅ ជា ឃួយ Tell. 012 883 073/016 521 349 ។ រីឯបងស្រីពីរនាក់ទៀត ឈ្មោះ ឡូវ ឃាង (LOV KEANG) Tell. 017 618 694 និង ឡូវ ហ៊ាង Tell. 011 720 750 ។

ប្រសិនបើអស់លោកអ្នកបានស្គាល់ឈ្មោះ ធឿន ប្រាង (THOEUN PRANG) ហៅ ឡូវ ឡេង (LOV LENG) នេះ សូមមេត្តាផ្តល់ ដំណឹងឱ្យខ្ញុំបាទ ឈួន គីមសុង តាមរយៈ ទូរស័ព្ទលេខ (818) 895 1067 ឬ E-mail: kimsongchhuon@gmail.com

ខ្ញុំបាទសូមថ្លែងអំណរគុណដ៏ជ្រាលជ្រៅចំពោះលោកទុកជាមុន !

## ANNOUNCEMENT

My name is Kim Song Chhuon, living in California. I am looking for my relative whose name is THOEUN PRANG. He lived at 4933 Old York Rd. Philadelphia, PA 19141, approximately 10 years ago.

Thoeun Prang has an older brother, Chea Nhuong or Lov, Khouy living in Phnom Penh, Tel 012 883 073 and 016 521 349. Thoeun Prang also has 2 sisters. Her name is Lov, Keang, Tel 017 618 694 and another sister is Lov,Heang, Tel 011 720 750.

I am trying to help them to find their brother, because they lost communications with him.

If anybody knows Thoeun Prang, please tell him to contact me at 818-895 1067 or kimsongchhuon@gmail.com or contact his relatives in Phnom Penh.

Thank you.

តមកទំព័រទី ៣

# ស្វែងយល់អំពីពិធីចូលឆ្នាំខ្មែរ

ដូច្នេះប្រជាកសិករខ្មែរអាចសម្រាកលំហែកាយបានក្រោយពីការខំប្រឹងប្រែងយ៉ាងហត់នឿយក្នុងការប្រមែប្រមូលទុកដាក់ និងលក់ដូរភោគផលយកកំរៃចិញ្ចឹមគ្រួសារ ។ ដូច្នេះហើយខែមេសានេះជាឱកាសល្អដែលប្រជាពលរដ្ឋខ្មែរទូទាំងប្រទេសកម្ពុជានាំគ្នាប្រារព្ធពិធីបុណ្យចូលឆ្នាំថ្មី ។

យោងតាមឯកសារទាក់ទង និងព្រះពុទ្ធសាសនាមួយឈ្មោះ "ព្រហ្មចរិយេសនា"បានឱ្យដឹងថា: បុណ្យចូលឆ្នាំខ្មែរមានប្រភពដើមកំណើតចេញមកពីព្រហ្មញ្ញសាសនាផ្សេងៗ ក៏បានយករបៀប និងក្បួនខ្នាតសំខាន់ៗជាច្រើនពីព្រហ្មណ្ណសាសនាមកបញ្ចូលរួមផ្សំជាមួយពិធីបុណ្យរបស់ខ្លួន ។

**ថ្ងៃទាំង៣នៃពិធីបុណ្យចូលឆ្នាំខ្មែរ**

នៅថ្ងៃទី០១ នៃពិធីបុណ្យ គឺជា"មហាសង្ក្រាន្ត" ។ បើនិយាយឱ្យងាយស្តាប់"មហាសង្ក្រាន្ត" គឺជាថ្ងៃទទួលគោរពទេវតាឆ្នាំថ្មី ដែលលោកយោងមកថែរក្សាពិភពលោកក្នុងរយៈពេលនៃឆ្នាំថ្មីនេះ ។ នៅថ្ងៃនេះប្រជានុជនប្រុសស្រីទាំងឡាយត្រូវបោសំអាត និងតុបតែងផ្ទះសម្បែង ហើយរៀបចំគ្រឿងសក្ការៈបូជាមាន ទៀន ធូប ផ្កាភ្ញី នំចំណី ផ្លែឈើ ជាដើមសម្រាប់ជូនមាតាបិតា អាណាព្យាបាលបុព្វការីជន ព្រមទាំងទទួលស្វាគមន៍ទេវាតាឆ្នាំថ្មីនៅតាមផ្ទះរៀងៗខ្លួន ។ នៅព្រឹកថ្ងៃទី០១ ប្រជានុជនភាគច្រើនរៀបចំចំអិនម្ហូបអាហារ នំចំណី ធ្វើចង្ហាន់យកទៅប្រគេនព្រះសង្ឃនៅតាមវត្តអារាម ដើម្បីសុំពរសព្ទសាធុការ និងសុំសេចក្តីសុខសប្បាយក្នុងឱកាសចូលឆ្នាំថ្មីនេះ ។

ថ្ងៃទី ២ ជាថ្ងៃ "វារៈវនប័ត"ដែលមានន័យថា ជាថ្ងៃដែលកូនចៅទាំងអស់ជូនអំណោយដល់មាតាបិតា ជីដូនជីតា និងចាស់ព្រឹទ្ធាចារ្យទាំងឡាយ ។ ជាធម្មតាប្រជាពលរដ្ឋខ្មែរតែងតែធ្វើជាអំណោយជាលុយកាក់ ឬសំពត់ខោអាវដល់អ្នកក្រខ្សត់ ។ នៅពេលរសៀលគេនាំគ្នាទៅវត្តដើម្បីពូនភ្នំខ្សាច់ និងនិមន្តព្រះសង្ឃសូត្រធម៌ប្រោះព្រំពរជ័យសូមឱ្យបានសេចក្តីសុខសប្បាយ និងមានសន្តិភាព ។

ថ្ងៃទី៣ គឺជាថ្ងៃ"វារៈឡើងស័ក"ដែលមានន័យថា ជាសករាជឆ្នាំថ្មីបានចាប់ផ្តើមរាប់ពីថ្ងៃនេះទៅហើយ ។ តាមប្រពៃណីនៅព្រឹកថ្ងៃទី ៣ នេះយើងតែងនាំគ្នាទៅវត្តអារាមក្នុងការប្រារព្ធពិធីពូនភ្នំខ្សាច់ដើម្បីឱ្យបានសិរីសួស្តី ។ លុះនៅពេលល្ងាចជាកិច្ចបង្ហើយបុណ្យ ។ពុទ្ធសាសនិកជនខ្មែរបានប្រារព្ធធ្វើពិធីស្រង់ព្រះ ឬប្រោះទឹកថ្វាយព្រះបដិមាករ ប្រគេន ព្រះសង្ឃ និងជូនចាស់ព្រឹទ្ធាចារ្យ មាតាបិតា និងជីដូនជីតាដើម្បីសុំខមាទោសនូវកំហុសឆ្គងទាំងឡាយដែលកូនចៅបានធ្វើឡើងដោយចេតនាក្តី ឬដោយអចេតនាក្តី ។

ជារួមបុណ្យចូលឆ្នាំជាបុណ្យប្រពៃណីជាតិដ៏ធំមួយដ៏ល្អផូរផង់ដែលបន្សល់ទុកពីដូនតាយូយារណាស់មកហើយ ។ ហើយបុណ្យចូលឆ្នាំនេះក៏ជាឱកាសល្អមួយដែលក្រមុំកំលោះខ្មែរត្រូវបានមាតាបិតាអនុញ្ញាតិឱ្យពួកគេជួបជុំគ្នាលេងកំសាន្តល្បែងប្រជាប្រិយជាតិ ។ ប៉ុន្តែបច្ចុប្បន្នល្បែងប្រជាប្រិយជាតិដូចជា បោះអង្គុញ ចោលឈូង ទាញព្រ័ត្រ លាក់កន្សែង ចាប់កូនខ្លែង ស្តេចចង់ ស្វាដណ្តើមទី វាយក្អម បាយខុម ។ល។ ហាក់មានលក្ខណៈស្រុតចុះស្ទើរតែបាត់បង់អស់ ។ ប៉ុន្តែចំពោះអ្វីដែលជាទីពេញនិយមសម្រាប់ក្រុមយុវវ័យក្នុងឱកាសបុណ្យចូលឆ្នាំខ្មែរនោះ គឺការរាំចុងបាស់ និងបាតម្សៅ បាចទឹកដាក់គ្នាដែលសកម្មភាពទាំងនេះពុំធ្លាប់កើតមានក្នុងសង្គមកម្ពុជា នាគ្រាមុនៗឡើយ ។ ហើយជារឿយៗសកម្មភាពដូចបានរៀបរាប់ខាងលើនេះតែងតែបង្កនូវរឿងរ៉ាវផ្សេងៗរហូតឈានដល់មានការវាយចាក់គ្នាជារៀងរាល់ឆ្នាំ ៕

តមកទំព័រទី ៨

# បង្កើតក្រុងខ្មែរនៅឡូវែល

គឺគាត់ត្រូវតែចូលរួមចំណែកលើអ្វីដែលជារបស់ពួកគាត់ ។

**ខ្មែរផុស :** ដូច្នេះដើម្បីឱ្យក្រុងនោះជារបស់គាត់ តើពួកគាត់មានឱកាសសមរាប់ជ្រើសរើសទេ ដូចជាថា ខ្ញុំចង់ឱ្យក្រុងខ្មែរនឹងមាននេះ ឬមិនត្រូវមាននោះទេ ?

**វ៉ាស្នា នួន :** មានប្រជុំពីរបីដងមានយាយតាក៏ចូលរួមមានក្រុមពាណិជ្ជករមានការឱ្យយោបល់យ៉ាងច្រើនមុននឹងមានការសំរេចចិត្តនិមួយៗនោះ យើងក៏មិនចង់ឱ្យសាលាក្រុងដាក់បញ្ជាឱ្យយើងធ្វើនេះ ឬធ្វើនោះលើក្រុងយើងនោះទេ ដូចច្នេះសូម្បីតែរូបសញ្ញាកៅអីសួនច្បារ ធុងសម្រាមមានការឱ្យយោបល់ច្រើនបាទ !

**ខ្មែរផុស :** ខ្ញុំគិតទៅដល់ពិធីនានារៀបចំក្នុងក្រុងខ្មែរ តើអ្នកណាជាអ្នកចេញមុខទទួលខុសត្រូវធ្វើ ?

**វ៉ាស្នា នួន :** យើងធ្វើរួមគ្នាឥឡូវនេះអង្គការខ្មែរក៏មានចំរុះ ហើយគ្រប់អង្គការក៏ត្រូវធ្វើចូលរួមដោយមិនចាំបាច់ដណ្តើមគ្នាជានេះរបស់ខ្ញុំនោះរបស់ឯងអ្វីទេ ដូច្នេះក្រុងខ្មែរត្រូវតែខ្មែរចូលរួមចំរុះគ្នា

**ខ្មែរផុស :** ខ្ញុំជូនឧទាហរណ៍បញ្ជាក់ពីសំនួររបស់ខ្ញុំថា ក្រុងខ្មែរអាចមានព្រលឹងខ្មែរ មានវប្បធម៌ខ្មែររស់ជាប់គ្នា តើទីនោះមានរោងកុន ឬល្ខោនដែលខ្មែរអាចសំដែង១ខែម្តង២ខែម្តងមានសាលាបង្ហាត់សិល្បៈខ្មែរសាធារណៈដែលផលិតកម្មវិធីសិល្បៈ ដូចអ្នកចង់មើលល្ខោន ឬរបាំខ្មែរ សូមឱ្យទៅឡូវែល ! យ៉ាងម៉េចដែរ !

**វ៉ាស្នា នួន :** ខ្ញុំជាសមាជិកក្រុមប្រឹក្សាក្រុងចង់ឃើញតែគំនិតរបៀបនេះកើតឡើងនៅឡូវែលនេះ ចង់ឃើញបងប្អូនចូលសញ្ជាតិចង់ឃើញខ្មែរចេញទៅបោះឆ្នោតទាមទារយកសារសំខាន់ពីកន្លែងដែលយើងរស់នៅកូនចៅមានការចេះដឹងស្គាល់វប្បធម៌ជាតិ វាមានមោទនភាពនឹងរៀនធ្វើអ្វីជាមួយគេឯង ដូច្នេះ បើឆ្នាំនេះខ្មែរយើងមានក្រុមប្រឹក្សាក្រុងម្នាក់ ឆ្នាំក្រោយមានសមាជិកគណៈកម្មការសាលារៀនសហគន៏ខ្មែរ និងមានកំលាំងមាំមួនឡើង ។ នៅពេលខ្ញុំបោះឆ្នោតសហគមន៏ខ្មែរយើងបានបង្ហាញថា ចង់



បានឱ្យមានតំណាងម្នាក់នៅសាលាក្រុងគេបាននាំគ្នាបោះឆ្នោតឱ្យខ្ញុំបានឈ្នះលើអ្នកដែលធ្លាប់តែឈ្នះនៅលើតំបន់នេះតាំងពី១៥ឆ្នាំមកហើយថែមទៀត ដូច្នេះ បើយើងចេះបង្ហាញថា យើងចង់បានអ្វីមួយយើងនឹងអាចធ្វើទៅបាន ។

**ខ្មែរផុស :** តើការងាររបស់លោកមានប្រាក់បៀវត្សដែរ ឬទេ ?

**វ៉ាស្នា នួន :** ឥតមានទេ

**ខ្មែរផុស :** ដូច្នេះលោករស់នៅយ៉ាងម៉េចបាន ?

**វ៉ាស្នា នួន :** ខ្ញុំមានការងារផ្សេងៗដែលមិនមានទំនាស់នឹងការងារនៅ សាលា ក្រុងនោះទេ អ្នកខ្លះថា ខ្ញុំឡើងជាអ្នកធំ ហើយឥឡូវ នេះខ្ញុំថាធំតែឥតប្រាក់ខែទេ តែគេឱ្យប្រាក់បំណាត់សម្រាប់ចំណាយបន្តិចបន្តួចដែរ បាន ១.៥ម៉ឺនក្នុងមួយឆ្នាំ ។

**ខ្មែរផុស :** សូមអរគុណ លោក វ៉ាស្នា នួន ៕

300+ Cars a week



# បើកកម្មវិធីដេញថ្លៃឡានជាសាធារណៈ:

INTERSTATE Auto Auction

Auctioncar.net (603) 893-7777

## In Salem, NH-Just 20 Minutes from Lowell MA

**OPEN TO THE PUBLIC LIVE CAR AUCTION Saturdays 10AM**

***Test Starts/Preview! Starts at 9AM***

# Wednesdays 5:30PM

***Free Test Drives Before You Buy!***

**Starts Wednesday at 9AM-5PM**

Only 40 Minutes From Lynn and Revere, MA

Just Over 1 Hour from Providence, RI

Or You Can Even Bid Online From Philadelphia, PA or New Jersey and Have The Car Delivered to Your Home"

**www.interstateautoauction.com**

**NH Lic#Auctioneer Alan Chambers/20 Hampshire Road - Salem NH 03079**



2008 Chevrolet Suburban $21,400 Beautiful Condition!




2000 Chevrolet Cavalier $950 Runs Great!




2001 Volkswagen Jetta $1,800 Clean



1998 Chevrolet Lumina $850 Turn Key and Go!



1997 Honda Prelude $3,999 Well Maintained



2001 Isuzu Rodeo $1,999 4x4 Clean



1997 Saturn SL2 $800 Ready to Go Home!

-ឥតមានកក់លុយ សម្រាប់ដេញថ្លៃនៅក្នុង Online ឬទៅកន្លែងទេ -មានឡាន៣00 ក្នុងមួយសប្តាហ៍

-Interstate Auto Auction, Salem NH ដែលនៅចម្ងាយ២0នាទីពីក្រុងឡូវែល អ្នកណាក៏អាចចូលរួមបានដែរ !

**-នៅថ្ងៃសៅរ៍ ម៉ោង១0:00ព្រឹក** លោកអ្នកអាចបញ្ជេះឡាន/ការសម្តែងឡានមុនម៉ោង៩ព្រឹក

**-ថ្ងៃពុធនៅវេលាម៉ោង៥:៣0នាទីល្ងាច :** លោកអ្នកអាចបើកឡានសាកល្បងពីរម៉ោង៩ព្រឹកដល់ម៉ោង៥ល្ងាច